# KhmerPost USA

សុបិន : (267) 253-3947, សែម : (781) 244-0522


មាតិការឿង — ទំព័រ




VOL. 06 ISSUE 111 Jul.20th - Aug.3rd, 2012


# កូនប្រុសអគ្គកុងស៊ុលខ្មែរត្រូវប៉ូលិសបាញ់សម្លាប់

ខ្មែរប៉ុស្តិ៍.ស.រ.អា



ហ៊ឹម្យាវែលហៀ : ព្រះសង្ឃវត្តបាលិលេយ្យបានសូត្រជយន្តោនៅជ្រុងផ្លូវទីដ្ឋ តទៅទំព័រទី០៧

# ប្រវត្តិថ្មីនៃបក្សប្រឆាំងទាំងពីររបស់កម្ពុជា

ដោយ : អ៊ុម លឿម



កឹម សុខា និង សម រង្ស៊ី សន្យាចងសម្ព័ន្ធភាពនយោបាយ

ទីបំផុតគណបក្សប្រឆាំង សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សក៏បានឈានដល់ការឯកភាពគ្នាក្នុងការបង្កើតបក្សថ្មីមួយ ដោយពុំប្រើប្រាស់ឈ្មោះបក្សទាំងពីរដែលកំពុងប្រើប្រាស់ នាពេលបច្ចុប្បន្ន និងព្រមទាំងឈានដល់ការសម្រេចបង្កើតសម្ព័ន្ធភាពថ្មី ដែលមានឈ្មោះថា "ចលនាប្រជាធិបតេយ្យសង្គ្រោះជាតិ" ។ សម្រាប់ឈ្មោះបក្សដែលនឹងចាប់បដិសន្ធិរវាងបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សនេះនៅពុំទាន់រកឈ្មោះឃើញនៅឡើយទេ ។

ការឯកភាពរវាងបក្សនយោបាយដែលអះអាងថា ជាបក្សប្រជាធិបតេយ្យទាំងពីរនេះត្រូវបានចាប់កំណើតឡើងនៅឯទីក្រុងម៉ានីលនាប្រទេសហ្វីលីពីន កាលពី ថ្ងៃទី១៦-១៧ខែ កក្កដា កន្លងមកនេះ ស្ថិតនៅសាលប្រជុំមួយឈ្មោះ "ក្រុមប្រឹក្សាអ្នកប្រជាធិបតេយ្យសេរី អាស៊ី" ឬ "Council of Asian Leberals and democracy" ។

តទៅទំព័រទី ១៥

# លេខទី១៧-តើទិវាមាតាមានន័យអ្វីសម្រាប់យើង?



**ដោយ : គីម ភៀន**

**តពីលេខមុន**

កើតមានឡើងសម្រាប់ស្ត្រីខ្មែរមានគ្រប់ជំនាន់: ជំនាន់ម៉ែ,ជំនាន់ម្តាយរបស់ម៉ែ, ជំនាន់កូនស្រីរបស់ម៉ែ,វាចេះតែបន្តគ្នាមិនចេះចប់សោះខ្មែររងកម្មមកយូរហើយ តើកាលណាចប់ទៅ? ម៉ែឆ្លើយថា: កូនអើយ! ចាំមើលព្រៃនគររលំ ហើយចាំមើល ភ្នំពេញរលាយ ដល់បាងកកវាត្រូវខ្ចាត់ខ្ចាយទើបសប្បាយនាបុរីអង្គរ ។

ពេលដឹងក្តីបន្តិចអ៊ុំសួរម៉ែអ៊ុំទៀតពីរឿងចម្រៀងនោះមានន័យថាម៉េច ព្រោះកាលនោះនៅតូចមិនទាន់ដឹងអី ម៉ែមានទឹកមុខសោកសៅឆ្លើយ... សុបិនដឹងឆ្លើយថាម៉េចទេ? គាត់គិតមួយសន្ទុះទើបឆ្លើយដោយសម្តីមួយៗ "ម៉ែក៏មិនសូវយល់អីច្បាស់ដែរកូនអើយ ម៉ែថែមទាំងមិនចេះអក្សរទៀតផង តែម៉ែបានខាងចាំតែឮគេនិយាយអី,ម៉ែចាំ ។ ពីក្មេងម៉ែចូលចិត្តស្តាប់ជីតាកូនអានអក្សរស្លឹករិត ម៉ែចាំរឿងមាយើង,រឿងមរណៈមាតា,រឿងនាងកង្រី,រឿងល្បើកផ្សេងៗ, រឿងត្រីនិងជុច,មាយាស្រីដកខ្វី,រឿងផ្ការផ្កាំក្តាមខ្យងជាដើម ។ រឿងទាំងនេះវាងាយយល់តែកូនសួរនេះម៉ែយល់មិនច្បាស់ទេ រហូតដល់ជីតាកូន ក៏មិនហ៊ានបកស្រាយឱ្យអស់អារីសេចក្តីបានទេគាត់ប្រាប់ថា នោះគេហៅថា ពុទ្ធទំនាយ ឬក៏ឥន្ទទំនាយ គឺជាទំនាយទាយទុក,ព្យាករណ៍ទុកឱ្យមនុស្ស (ខ្មែរ)ជំនាន់ក្រោយរងចាំមើលទាល់តែហេតុការណ៍កើតឡើងស្រដៀង ឬជ្រលិះ ទើបគេកាត់ដោយផ្អែកទៅលើហេតុការណ៍នោះថា អូរទំនាយពិតជាត្រូវមែន (នេះជាឱ្យទាហរណ៍មួយណាំសុបិន : ទាល់តែពេលគេឃើញខ្មែរក្រហមចូលមកធ្វើបាបប្រជាជាតិខ្មែរពេញមួយនគរ ហើយស្លៀកពាក់សុទ្ធតែឯកសណ្ឋានពណ៌ខ្មៅ ទើបគេយល់ថា ក្បួនពារសៅរ៍ពិតជាត្រូវមែន,ត្រង់ឃ្លាថា: "ក្អែកពាំផ្លែល្វារាយគ្រប់ស្រុក... ចំណៀវទៅមុខទើបដឹងខ្លួន" ។ល។) ។ អញ្ចឹងខ្ញុំស្តាប់សំដីម្តាយអ៊ុំតទៅទៀតចុះ ពេលនោះអ៊ុំ ទើបតែមានអាយុប្រហែល៥ទៅ៦ឆ្នាំប៉ុណ្ណោះស្តាប់ពាក្យម៉ែបកស្រាយអ៊ុំក៏មិនយល់អ្វីដែរ តែធំឡើងបានរៀនសូត្រចេះដឹងខ្លះអ៊ុំក៏ស្វែងយល់បន្ថែមខ្លួនឯង ។ បើតាមអ៊ុំគិតគន់មើលទៅកាលដែលគាត់និទានរឿងនានានឹងក្បួនពារសៅរ៍ និងពុទ្ធទំនាយនោះប្រហែលនៅក្នុងឆ្នាំ១៩៤៥ពេលនោះបារាំងដែលជាអាណាព្យាបាលដីកូសាំងស៊ីន(គឺដីកម្ពុជាក្រោមសព្វថ្ងៃ,ជាដែនដីខ្មែរត្រូវយួនបួន់ដណ្តើមយកធ្វើជាទឹកដីកម្មសិទ្ធរបស់គេ) នោះត្រូវចាញ់សង្គ្រាមជប៉ុន,បារាំងមួយចំនួនត្រូវជប៉ុនចាប់ច្រកគុកមួយចំនួនរត់ចូលព្រៃស្វែងរក ឬរង់ចាំសម្ព័ន្ធមិត្តចូលមករំដោះ ។ ពេលនោះហូជីមិញប្រកាសឯករាជ្យនៅដែនដីភាគខាងជើង(ហាណូយ),វៀតណាមខាងត្បូង គឺកម្ពុជាក្រោមគ្មានបារាំងជាអាណាព្យាបាលទៀត យួនក៏ផ្ទុះឡើងសម្លាប់រង្គាលខ្មែរក្រោមសឹងផុតពូជ,ក្រៅពីកាប់សម្លាប់ដោយកាំបិតពូថៅ និងកាំភ្លើងដែលបានពីបារាំង និងជប៉ុន, ពួកព្រៃផ្សៃទាំងនោះ បានបញ្ឆោតនិងគៀងខ្មែរក្រោមបញ្ចូលឡឹម(ជង្រុកស្រូវ ឬអាគារធំៗសម្រាប់ស្តុករបស់របរផ្សេងៗ) រួចចាក់សោរជាប់ក៏ដុតសម្លាប់ខ្មែរកម្ពុជាក្រោមរបស់យើងលើកទីពីរក្រោយពីសម្លាប់រង្គាលកាលជំនាន់ពេលចាប់ខ្មែរក្រោមដីកព្រៃកវិញតែ "ប្រយ័ត្នកំពប់តែអុង" ។

KHMER POST USA, LLC
East Coast Publication

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* **Loeum Im**

*Contributed Writers:*
**Mam Yin, Kim Phien**
*Advertising Department*

**Soben Pin**
KhmerPostUSA@gmail.com
**267-253-3947**

**Sam Khoeun**
*Sales Consultant*
**(781) 244-0522**

*Design Staffs:*
**Leang Heng & Mong Meng**

~~~~~~

KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English.
It published twice a month in Pennsylvanian & Massachusett.

~~~~

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year.
Money order or check is accepted and made payable to:
KhmerPost USA, LLC
438 LINDLEY AVE.
Philadelphia, PA 19120

~~~

The Khmer Post has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# នាទីជួបជាមួយព្រឹទ្ធសមាជិកខ្មែរ



លោក ហូ វ៉ាន់

**ហ្វីឡាដែលហ្វៀ :** នៅប្រមាណ១អាទិត្យមុនគណបក្ស សម រង្ស៊ី សម្រេចបាននូវកិច្ចព្រមព្រៀងសម្ព័ន្ធភាព ដើម្បីចូលរួមគ្នាជាកម្លាំងតែមួយ ដើម្បីបោះឆ្នោតសាកលនៅឆ្នាំក្រោយជាមួយគណបក្សសិទ្ធិមនុស្ស លោក ហូ វ៉ាន់ ជាព្រឹទ្ធសមាជិកខ្មែរមកពីគណបក្ស សមរង្ស៊ី បានមកសម្តែងការគួរសមដល់បងប្អូនខ្មែរនៅហ្វីឡាដែលហ្វៀ ដើម្បីប្រាប់ពីព័ត៌មាននយោបាយជាតិ ពីការបោះឆ្នោតឃុំសង្កាត់ ដែលទើបកន្លងផុតថ្មីៗ ហើយនឹងដំណឹងពីការប្រែប្រួលស្តីអំពីសម្ព័ន្ធភាពរវាងគណបក្ស សមរង្ស៊ី នឹងគណបក្សសិទ្ធិមនុស្ស កិច្ចប្រជុំរៀបចំឡើងដោយលោក មាស ជា ប្រធានសាខានៅហ្វីឡាដែលហ្វៀ។

ចំពោះបញ្ហាជាតិ លោក ហ៊ូ វ៉ាន់ បានលើកជាចម្បងពីបញ្ហារំលោភយកដីធ្លីរបស់ប្រជាជន ដោយអាជ្ញាធរខ្មែរ ពុំមាននរណាអាចទប់បាន ទោះបីជាច្បាប់រដ្ឋក៏ពុំមានលទ្ធភាពទប់ទល់បានទេ ។ លោកបានលើកអំពីអំពើពុករលួយ នៃអ្នកកាន់អំណាចរដ្ឋដែលស៊ីរូងប្រជាជាតិ រីឯព្រំប្រទល់ដែលក៏មិនអាចការពារបាន សូម្បីតែភូមិកំណើតរបស់ លោកប្រធានរដ្ឋសភា ហេង សំរិន ក៏ត្រូវប្រគល់ឱ្យទៅមិត្តវៀតណាមដែរ ។ រីឯបញ្ហាបោះឆ្នោត ឃុំសង្កាត់ដែលទើបកន្លងផុតថ្មីៗ ដោយការថយចំនួនអ្នកជាប់ឆ្នោតខាងគណបក្ស សមរង្ស៊ី លោកបានបន្ទោសអំពីអំពើពុករលួយលួចសន្លឹកឆ្នោតទិញទឹកចិត្តអ្នកបោះឆ្នោត ហើយក៏មានការទទួលស្គាល់ថា មានសន្លឹកឆ្នោតផ្ទេរទៅខាងគណបក្ស សិទ្ធិមនុស្សមួយចំនួនមែន តែលោកបញ្ជាក់



លោក មាស ជា

ថា ប្រសិនបើមានការចងសម្ព័ន្ធភាពរវាងគណបក្សប្រឆាំងទាំងពីរពេលនោះ សម្លេងឆ្នោតពុំមែនបូកគ្នាទេ គឺនឹងគុនយ៉ាងហោចទ្វេដងនៃចំនួនបូកគ្នាឯណោះ ។ លោកបន្តថា លោកមានជំនឿលើសម្ព័ន្ធភាពនៃគណបក្សប្រជាធិបតេយ្យទាំងអស់រួមគ្នា ទោះជាគណបក្សនោះតូចតាចក៏ដោយ ។

មានសំណួរ នឹងយោបល់មួយចំនួនពីបញ្ហាអ្នកចូលរួមស្តាប់សេចក្តីរាយការណ៍ លោក ហ៊ូ វ៉ាន់ ។ លោកត្រាយ ហ៊ល តំណាងឱ្យគណបក្សសិទ្ធិមនុស្សបានលើកពីការគាំទ្ររបស់សាខាបក្ស ចំពោះសម្ព័ន្ធភាពនៃគណបក្សប្រឆាំងធំទាំងពីរ ។ មានវាគ្មិនមួយចំនួនបានសម្តែងការគាំទ្រគំនិត ដែលថា ថ្វីត្បិតតែអំពើអាស្រូវបានកើតចេញពីទង្វើរបស់គណកប្សប្រជាជន ចំពោះជាតិ ក៏ប៉ុន្តែក៏ក្នុងនៅមានមនុស្សល្អជាច្រើន



លោក ត្រាល ហ៊ល

ផងដែរ ដែលគេមិនអាចតាំងជម្លោះជាមួយគណបក្សប្រជាជនទាំងអស់នោះទេ ។ នៅក្នុងគំនិតនេះមានសំណួរមួយគួរឱ្យកត់សម្គាល់របស់សមាជិកគណបក្សប្រជាជន គឺលោក ផិន វុទ្ធា ដែលបានសួរថា" លោកថា គណបក្សប្រជាជនការពារអ្នកមានធ្វើបាបអ្នកក្រ តើគណបក្សលោកមានអ្វីគ្រាន់បើដែរឬទេ ដើម្បីកុំឱ្យប៉ះពាល់ដល់អ្នកក្រ?"លោក ហ៊ូ វ៉ាន់ បានលើកយកមកពន្យល់នូវវិធានការបក្ស១០១ ខ មកបង្ហាញថា ទាំងនោះជាការគ្រប់គ្រងដែលមានការធានាថានឹងមិនប៉ះពាល់ដល់អ្នកក្រ។

**ដោយ : ខ្មែរប៉ុស្តិ៍**
~~~

# លោកសាស្ត្រាចារ្យ ធុយ ចាន់ធួន : មានដែកនៅក្នុងថ្មរបស់ប្រាសាទបុរាណនានារបស់ខ្មែរ

## នាទីជួបជាមួយអ្នកឯកទេសខាងស្រាវជ្រាវឯកសារប្រវត្តិសាស្ត្ររៀបចំដោយខ្មែរផ្ទុសស.រ.អា និងសមាគមគាំទ្រគ្រួសារខ្មែរ ។

**ដោយ : អ៊ុម លឿម**

ជាការពិតណាស់ដែលថា កម្ពុជាសម័យបុព្វកាលជាប្រទេសមួយដែលមានកិត្យានុភាពដ៏ល្បីល្បាញរុងរឿងបំផុតនៅតំបន់អាស៊ីអាគ្នេយ៍ និងក៏ជាប្រទេសដែលមានឥទ្ធិពលមហាសាលស្ទើរគ្រប់វិស័យទាំងអស់ ជាហេតុធ្វើវិសាលភាពនៃដែនដីអាណាចក្រកម្ពុជាលាតសន្ធឹងដ៏ធំល្វឹងល្វើយ ។ ជាមួយនឹងភាពធំទូលាយនៃដែនដីដ៏អច្ឆរិយនេះ អាណាចក្រកម្ពុជាក៏បានសាងសង់នូវប្រាសាទនានាជាច្រើន ដែលបច្ចុប្បន្នប្រាសាទបុរាណទាំងនោះ ត្រូវបានគេប្រទះឃើញនៅឯប្រទេសជិតខាងមួយចំនួន ដូចជា នៅឯប្រទេសថៃ ប្រទេសឡាវ ប្រទេសយួន និងថ្មីៗនេះត្រូវបានគេប្រទះឃើញនៅឯប្រទេសម៉ាឡេស៊ីជាដើម...។

ក្នុងចំណោមប្រាសាទបុរាណទាំងអស់"ប្រាសាទអង្គរវត្ត"ត្រូវបានទទួលនូវការកោតសរសើរ និងស្ញប់ស្ញែងជាងប្រាសាទបុរាណនានាទាំងអស់ ព្រោះនោះជាស្ថាបត្យកម្មដ៏ល្អប្រណិតមួយដែលពុំមានពីរក្នុងលោក និងជាសំណង់ស្ថាបត្យកម្មដែលស្ថាបនិក និងវិស្វករជំនាន់នោះសាងសង់ ដោយដៃ និងគ្មានឧបករណ៍បច្ចេកទេសទំនើបៗដូចបច្ចុប្បន្នឡើយ ។ ប៉ុន្តែផ្ទុយទៅវិញសំណង់អង្គរហាក់នៅមានលក្ខណៈរឹងមាំ ទោះបីជាមានអាយុកាលរាប់ពាន់ឆ្នាំហើយក្តី ។ ភាពអស្ចារ្យ


លោក ធុយ ចាន់ធួន កំពុងពន្យល់អំពីថ្មប្រាសាទដល់បងប្អូនខ្មែរនៅហ្វីឡា


លោក ធុយ ចាន់ធួន បង្ហាញពីរូបកំទេចដែកដែលរាប់ហានតោនដែលរកឃើញនៅភាគខាងជើងកម្ពុជា

និងភាពប៉ិនប្រសព្វនៃស្ថាបនិកក្នុងសម័យអង្គរ គឺអាចសាងសង់បានប្រាសាទនានាជាច្រើនដោយពុំចាំបាច់ប្រើប្រាស់លោហៈ ឬដែកក្នុងការសាងសង់ដូចសម័យបច្ចុប្បន្នឡើយ ដោយគ្រាន់តែតម្រៀបថ្មបន្តុបលើគ្នាជាការស្រេច ។ ទន្ទឹមគ្នានេះ គេនៅពុំទាន់បានឃើញឯកសារណាមួយដែលបញ្ជាក់ឱ្យបានច្បាស់ថា តើសំណង់ប្រាសាទបូរាណនានារបស់ខ្មែរ មានបង្កប់ដោយលោហៈ ឬដែកយ៉ាងណានោះឡើយ ប៉ុន្តែសម្រាប់ប្រជាពលរដ្ឋខ្មែរស្ទើរតែ១០០% តែងតែនិយាយតៗគ្នាថា "ភាពអស្ចារ្យរបស់ប្រាសាទបូរាណខ្មែរ គឺស្ថិតនៅត្រង់វិស្វករសាងសង់ដោយពុំមានប្រើប្រាស់លោហៈ ឬ ដែកអ្វីមកបង្កប់ជាមួយឡើយ ដោយប្រើប្រាស់ថ្មសុទ្ធសាធ"។

ទាក់ទងទៅនឹងសំណងស្ថាបត្យកម្មប្រាសាទបូរាណដ៏ល្អឯករបស់បុព្វបុរសខ្មែរនេះ ត្រូវបានលោក ធុយ ចាន់ធួន អនុប្រធានវិទ្យាស្ថានវប្បធម៌ និងវិចិត្រសិល្បៈ និងជាសាស្ត្រាចារ្យនៃសាកលវិទ្យាល័យមួយក្នុងទីក្រុងភ្នំពេញ ថ្លែងក្នុងអង្គសិក្ខាសាលាមួយនៅឯវត្ត"ព្រះពុទ្ធវង្ស៊ី"នាទីក្រុងហ្វីឡាដែលហៀវកាលពីរសៀលថ្ងៃអង្គារ៍ទី១៧ ខែកក្កដា កន្លងមកនេះថា : រាល់ប្រាសាទបូរាណខ្មែរទាំងអស់ គឺសាងសង់ឡើងដោយពុំអាចអត់ដែកបានឡើយ ។ នៅក្នុងន័យនេះ លោកសាស្ត្រាចារ្យដែលមានឯកទេសខាងស្រាវជ្រាវប្រាសាទបូរាណបានសង្កត់ធ្ងន់ថា: នៅក្នុងសម័យអង្គរ ឧស្សាហកម្មដែករបស់ខ្មែរ មានលក្ខណៈរីកចម្រើនល្អណាស់ ហើយរាល់ប្រាសាទនានារបស់ខ្មែរ គឺជាសម័យកាលមួយដែលមានភាពរីវឌ្ឍរីកចំរើនយ៉ាងខ្លាំង ។ លោកបន្តថា : ខ្មែរសម័យកាលនោះ ថ្វីត្បិតតែពុំទាន់ចេះធ្វើកញ្ចក់ពិតមែន ប៉ុន្តែខ្មែរយើងយកសិទ្ធសមិទ្ធិកម្មដែលធ្វើឡើងដោយដៃទទេសុទ្ធសាធ ហើយក៏ពុំមានព្រះពិស្ណុកាណាជាអ្នកសាងសង់ឡើយ ។ ប៉ុន្តែអាថិកំបាំងមួយដែលប្រជាពលរដ្ឋខ្មែរភាគច្រើនពុំបានដឹងនោះ គឺរាល់ប្រាសាទបូរាណនានារបស់ខ្មែរ គឺសុទ្ធសឹងមានដែកទាំងអស់ ។

ក្នុងជំនួបមួយដែលចូលរួមដោយភ្ញៀវពុំបាន២០នាក់ផងនោះ លោកសាស្ត្រាចារ្យ ធុយ ចាន់ធួន បានថ្លែង និងកោតសរសើរដល់បុព្វបុរសខ្មែរ និងកោតសរសើរដល់អាណាចក្រខ្មែរនាសម័យបុព្វកាលថា ជាសំរាប់ធ្វើកញ្ចក់វិញ។ ទាំងអស់នេះហើយ គឺឆ្លុះបញ្ចាំងនូវភាពអស្ចារ្យរបស់ខ្មែរនាសម័យនោះយ៉ាងពិតប្រាកដ ហើយអ្វីដែលជាការកតសម្គាល់ទៀតនោះ គឺភាពអស្ចារ្យរបស់ស្ពានបូរាណនានាមួយចំនួនដែលមានលក្ខណៈល្អប្រណិត នៅនឹងតែរក្សាលក្ខណៈដើមស្ទើរតែទាំងស្រុងរហូតដល់បច្ចុប្បន្ន ដូចជាស្ពាន"កំពង់ក្តី"នៅខេត្តសៀមរាបជាដើម ។


អ្នកចូលរួមសិក្ខាសាលា

លោកសាស្ត្រាចារ្យរូបនេះបានបន្តទៀតថា: ក្នុងខណៈដែលទីក្រុងឡុងនៃប្រទេសអង់គ្លេស ទើបតែមានកូនភូមិតូចៗនោះ គឺខ្មែរបានរស់នៅជុំវិញអង្គរជាង១លានកន្លះរួចស្រេចទៅហើយ ។

នេះជារបកគំហើញប្រវត្តិសាស្ត្ររបស់លោក ធុយ ចាន់ធួន ដែលលោកបានលាតត្រដាង និងបានអះអាងថា "បើគ្មានដែកទេ អ្វីៗក៏ពុំអាចធ្វើកើតឡើយ ជាពិសេសប្រាសាទអង្គរវត្ត និងប្រាសាទបុរាណរបស់ខ្មែរជាច្រើនទៀត **តទៅទំព័រទី ១៨**

# ចង្ក្រានខ្មែរ Khmer Kitchen


បុកល្ហុង

●●●ហាងម្ហូបខ្មែរថ្មីមួយទៀត ទើបនឹងចាប់ផ្តើមបើកទ្វារនាពាក់កណ្តាលខែសីហាមុននេះ នៅជ្រុងផ្លូវលេខ៦ និងម៉ូរីស មានឈ្មោះថា "ចង្ក្រានខ្មែរ" ។ យើងបានចូលទៅសាកល្បងហាងម្ហូបខ្មែរថ្មីមួយនោះ ដើម្បីរាយការណ៍ជូនលោកអ្នកអានជាទីសណ្តាប់ ។ នៅហ្វីឡាដែលហ្វីហ្វៀ ក្រុមពាណិជ្ជករពុំសូវហ៊ានប្រថុយប្រថានបើកភោជនីយដ្ឋានខ្មែរនោះទេ ព្រោះគេយល់ថា "ជាម្ហូបដែលគេពុំសូវស្គាល់" ម្ល៉ោះហើយ ច្រើនឃើញមុខម្ហូបខ្មែរប្រឡាយកាត់ចិន ឬយួនជាហូរហែរ ។ ទើបតែ២ឆ្នាំកន្លងមកនេះ ហាងម្ហូបខ្មែរ ទី១ បានបើកទ្វារនៅផ្លូវអូរ៉េគ្គាន់ បន្ទាប់មកហាងម្ហូបខ្មែរទី២ បើកនៅផ្លូវលេខ៧ខាងត្បូង មានឈ្មោះ "ការី" ឥឡូវមានហាងម្ហូបខ្មែរទី៣ តូចច្រឡឹងមួយហ៊ានចេញមុខនៅហ្វីឡាខាងត្បូង ជាភោជនីយដ្ឋានម្ហូបខ្មែរទី២ ហើយនៅខែក្រោយនឹងមានភោជនីយដ្ឋានខ្មែរមួយទៀត និងបើកទ្វារនៅហ្វីឡាភាគខាងជើង គឺជាសញ្ញានៃការវិវត្តន៍ ថ្មីមួយលើអត្តសញ្ញាណខ្មែរ ដែលមិនដែលមានពីមុនមកនៅហ្វីឡា ។

ថ្វីត្បិតតែពិបាករកកន្លែងចតរថយន្តដោយផ្លូវចង្អៀត ហើយងងឹតតែភ្ញៀវរាត្រីថ្ងៃសុក្រនោះ ពីភាគបីបំពេញដោយបរទេសស្បែកស-ខ្មៅ មិនដាច់រឹងភ្ញៀវខ្មែរមានតិចតួច តែខ្ញុំបានចូល "ចង្ក្រានខ្មែរ" កាលពីសប្តាហ៍មុននាពេលថ្ងៃត្រង់បែរជាសម្បូរណ៍ខ្មែរទៅវិញ ។

នៅភោជនីយដ្ឋានលក្ខណៈគ្រួសារដឹកនាំដោយ ភក្ត្រ ណេត-ដានី ឌុក និងអ្នកស្រី ផល្លា ឡុន ពុំមានធ្វើម្ហូបចំអិនទុកនោះទេ គឺចំអិនជូនភ្ញៀវភ្លាមៗ ពួកគេនិយាយដូចៗគ្នាថា ភ្ញៀវបរទេសចូលភ្លក់ម្ហូបខ្មែរចំនួនពីភាគបីនៃភ្ញៀវទាំងអស់ ។ ភ្ញៀវបរទេស នារាត្រីនោះបានប្រាប់យើងថា គេបានហូបម្ហូបខ្មែរដ៏ឆ្ងាញ់ពិសារណាស់ ហើយគេបានដំណឹងឆាប់រហ័សពីភោជនីយដ្ឋាននេះ ដោយខ្លះថា ផ្ទះគេនៅមិនឆ្ងាយពីនេះទេ ហើយខ្លះទៀតបានឃើញការផ្សាយនៅ Facebook ខ្លះថា មានមិត្ត ភ័ក្ត្រប្រាប់ ។ យើងបានបញ្ជាម្ហូបពីបួនមុខ គឺញាំល្ហុង-សាច់គោគ្រឿងអាំង-សម្លរម្ជូរសាច់គោ និងឆាម្រះព្រៅ ក្នុងចំណោមម្ហូប ខ្មែរច្រើនមុខ(ប្រមាណ៥០) ។ យើងបានសួរ លោក ភក្ត្រ ជាម្ចាស់ហាងម្នាក់ថា ហាងម្ហូបខ្មែរណាមួយ ជាគូប្រជែង របស់ លោក ភក្ត្រ ឆ្លើយយ៉ាង សញ្ជឹងថា ដូចជាគ្មានទេ ពីព្រោះទីនេះ យើងធ្វើតែម្ហូបខ្មែរសុទ្ធសាធ គឺម្ហូប ដែលយើងជាខ្មែរហូបរាល់ថ្ងៃហើយ យើងហ៊ានធ្វើលក់ក៏ព្រោះគ្រួសារយើងចេះ


សម្លរម្ជូរសាច់គោត្រកួន

ធ្វើម្ហូប ដែលគ្រួសារយើងហូប



ឆ្ងាញ់មាត់រាល់ថ្ងៃ ហើយភ្ញៀវដែលមកលេងក៏គេកោតសរសើរស្នាដៃ ធ្វើមុខម្ហូបនេះដែរ ខ្ញុំចេញពី



សាលាធ្វើម្ហូប យើងឥតមានធ្វើលាយម្ហូបជនជាតិដទៃទេ ។

យើងបានបញ្ជាមុខម្ហូបសាច់គោអាំង និងបុកល្ហុង ក៏ព្រោះតែរៀងរាល់រដូវក្តៅបងប្អូនខ្មែរ ធ្វើសាច់គោ ឬមាន់អាំងជ្រលក់ញាំ ជាម្ហូបប្រចាំត្រកូល លក់ព្រោងព្រាតតាមដកផ្លូវនៃភូមិខ្មែរ ឬតាមសួនឧទ្យាន "ស្បិតត្រម" យ៉ាងហូរហែរ... យើងឆ្ងល់ថា អ្វីទៅខុសពីសាច់គោអាំងខាងក្រៅ ដែលនិងទាក់ទាញភ្ញៀវឱ្យមកទីនេះ? ភក្ត្រ និយាយថា ខ្ញុំមិនដឹងថា ខុសគ្នាយ៉ាងណាដែរទេ តែការលក់ក្នុងហាងតែងមានការទទួលខុសត្រូវខ្ពស់លើបញ្ហាសុខភាពភ្ញៀវនោះ ហើយៗ ដែលខ្ញុំដឹងនោះ គឺសាច់គោអាំង និងបុកល្ហុងនេះ ប្រាកដជាឆ្ងាញ់ត្រូវមាត់ភ្ញៀវ... មែន សាច់គោ


សាច់គោ គ្រឿងអាំង


ឆាម្រះព្រៅ

គ្រឿងអាំង និងបុកល្ហុងថ្ងៃនេះ ឆ្ងាញ់ហើយត្រូវគ្នាណាស់ រួមជាមួយសម្លរម្ជូរសាច់គោជូរជ្រះ ហូបជាមួយបាយក្តៅៗធ្វើឱ្យនឹកដល់ពេលបាយនៅស្រុកខ្មែរភ្លាម... ថែមពីលើ នេះទៀតភ្ញៀវបរ ទេសនៅជិតយើងក៏ ហៅម្ហូបនេះដូចយើងដែរ ។

កន្លែងទទួលភ្ញៀវតូចដាក់បានតុ៦ក្នុងបន្ទប់ដែល មានពណ៌លឿងទុំ ទើបលាបហើយថ្មីៗ តាំងលម្អដោយវត្ថុអនុស្សាវរីយ៍ខ្មែរបន្តិចបន្តួច ភ្ញៀវពិសារបណ្តើរជជែកគ្នាតិចៗធ្វើឱ្យបរិយាកាសស្ងប់ស្ងាត់រីករាយជាគ្រួសារបាន ។ អ្នកស្រី ផល្លា ឡុន ជាម្ចាស់ម្នាក់ទៀត ទើបទំនេរដៃពីកិច្ច ការក្នុងចង្ក្រាន និយាយប្រាប់យើងថា "ខ្ញុំរៀនមុខវិជ្ជាម្ហូបនេះ ពី



ម្តាយខ្ញុំ ហើយខ្ញុំតែងមានការយកចិត្តទុកដាក់ខាងចំណេះធ្វើម្ហូបនេះជានិច្ច..." ។

ម៉ោងជិត៩យប់ទៅហើយ នៅមានភ្ញៀវបរទេសថ្មីៗទៀតចូលនៅឡើយ ហើយម្ចាស់ហាងនៅតែទទួលនៅឡើយ ។ សុភា ឌុច ជាម្ចាស់ហាងម្នាក់



ទៀតឆ្លៀតចេញ ពីចង្ក្រានមក និយាយជាមួយយើងថា "ទូក ញូក់ដាក់ម្ហូប ចំអិនរួចរបស់យើងមិនអាចប្រើការបានទេ ពីព្រោះកំដៅចេះតែធ្វើឱ្យម្ហូបឆាប់ផ្អូមហេតុនេះហើយបានជាយើងត្រូវធ្វើម្ហូបចំអិន ភ្លាមៗជូនភ្ញៀវ..."។ នៅលើ សំនួរថា ប៉ាយដាក់ ឈ្មោះហាងទំហំតូចហើយ គ្មានអក្សរខ្មែរទេ ភក្ត្រ ឆ្លើយជំនួសថា "ប៉ាយនេះធ្វើមិនទាន់ហើយអស់ទេ នៅមានអក្សរជាច្រើននឹងដាក់នៅចំហៀងឆ្វេងស្តាំចន្លោះទំនេរជាបន្ថែមទៀត..." ។ ភ្ញៀវ៥នាក់នៅតុក្បែរយើងហៅម្ហូបច្រើនចានច្រើនមុខ

តទៅទំព័រទី ១៨




# ជួយក្នុងការចូលសញ្ជាតិអាមេរិកាំង

- តើលោកអ្នកត្រូវការអ្នកជួយដើម្បីចូលសញ្ជាតិអាមេរិកាំង ឬក៏ស្គាល់អ្នកណាដែលចង់ចូលសញ្ជាតិអាមេរិកាំងទេ ?
- តើអ្នកដឹងទេថាលោកអ្នកអាចចូលសញ្ជាតិអាមេរិកាំងដោយមិនអស់លុយ?
- តើអ្នកដឹងទេថា លោកអ្នកអាចចូលសញ្ជាតិអាមេរិកាំងដោយមិនចាំបាច់ប្រឡង?

## ជួយក្នុងការសុំលុយពិការ ឬលុយចាស់ និងសុំសំបុត្រពេទ្យ

- តើអ្នកត្រូវការជួយសុំលុយពិការឬត្រូវការជួយសុំសំបុត្រពេទ្យ?

## ជួយខាងចិត្តសាស្ត្រ

- តើអ្នក ឬស្គាល់ណាដែលមានអារម្មណ៍ក្រៀមក្រំកើតទុក្ខពិបាកចិត្ត ត្រូវការអ្នកពិភាក្សា?
- តើអ្នកមានស្គាល់ជនណាដែលមានអារម្មណ៍ឆេវឆាវឆាប់ខឹង ដែលមិនអាចទប់កំហឹងបាន?
- តើអ្នកមានអារម្មណ៍ចង់ធ្វើបាបខ្លួនឯង ឬមានអារម្មណចង់ធ្វើបាបអ្នកដ៏ទៃ?
- តើអ្នកមានស្គាល់អ្នកណាដែលផឹកស្រាផឹកបៀរ ឬក៏ប្រើគ្រឿងស្រវឹង គ្រឿងញៀនដើម្បីដោះស្រាយបញ្ហា ឬក៏ដើម្បីបំភ្លេចបញ្ហានានា នូវពេលជួបប្រទះការលំបាក ឬក៏នៅពេលលំបាកចិត្ត?
- តើអ្នកចូលចិត្តលេងល្បែងស៊ីសង ឬស្គាល់អ្នកណាចូលចិត្តលេងល្បែងស៊ីសង ដែលចង់ឈប់ត្រូវការអ្នកពិភាក្សាតែមិនហ៊ានប្រាប់នរណាម្នាក់ពីព្រោះខ្មាស់គេ?
- តើអ្នកត្រូវការមិត្តមកពិភាក្សាអំពីបញ្ហាជីវិតតែមិនហ៊ានប្រាប់អ្នកណាពីព្រោះខ្លាចគេដឹងរឿងអាថ៏កំបាំង?

**ប្រសិនបើលោកអ្នកមានបញ្ហាខាងលើនេះចង់បានព័តិមានបន្ថែមឬដាក់ពេលណាត់ជួប សូមទូរសព្ទមកខ្ញុំបាទ ដេវីដ សេង** (267) 918-8493
ឬក៏ផ្ញើសារ **david.seng@ifsinc.org**

Intercultural Family Services, Inc.
South Philadelphia Office
2317 S. 23rd Street.
Philadelphia, Pa 19145
Phone: (215) 468-4673 Ext. #160

សេវាកម្មយើងទាំងអស់ គឺមិនគិតលុយ សំខាន់បំផុតរឿងរ៉ាវអាថិកំបាំងអ្នកទាំងអស់យើងនិងរក្សាជាការសំងាត់បំផុតគ្មានអ្នកណាដឹងឡើយ ។

# ក្លូបូលវិតណេសរាយការណ៍ពីបរិស្ថាននៅកម្ពុជា

(តពីលេខមុន)

- បំពេញ និងអនុម័តច្បាប់តំបន់ការពារថ្មី និងរាល់អនុក្រឹត្យ និងប្រកាស (សេចក្តីប្រកាសថ្នាក់ក្រសួង) ដែលមានទាំងអស់ដែលតម្រូវស្ថិតក្រោមច្បាប់ព្រៃឈើឆ្នាំ២០០២ ។ ធានាថា ពង្រាងត្រូវបានធ្វើឡើងឱ្យអាចទទួលបានជាសាធារណៈមុនពេលអនុម័ត ដែលអនុញ្ញាតឱ្យមានពេលវេលាគ្រប់គ្រាន់សម្រាប់ការផ្តល់យោបល់ជាសាធារណៈ ។
- ដាក់កំណត់ការបញ្ឈប់សាងសង់ផ្លូវតាមរយៈតំបន់ព្រៃស្របជាមួយអនុសាសន៍របស់ IFSR ឆ្នាំ ២០០៤ ។

[i] ព្រៃភាពជាដៃគូ ជាគំរូថ្មីមួយ ដែលស្នើដោយការពិនិត្យវិស័យព្រៃឈើដោយឯករាជ្យឆ្នាំ ២០០៤ ។ វានឹងផ្តល់ឱ្យសិទ្ធិកាន់តែទូលំទូលាយក្នុងការធ្វើសេចក្តីសម្រេចចិត្តគ្រប់គ្រងព្រៃឈើចំពោះក្រុមប្រឹក្សាឃុំ ដែលបានជ្រើសរើសដោយរដ្ឋបាលព្រៃឈើដើរតួនាទីចេញច្បាប់ ។

## ៤. ចាត់វិធានការណ៍បន្ទាន់ ដើម្បីបង្កើនតម្លាភាពក្នុងការគ្រប់គ្រងទ្រព្យសម្បត្តិសាធារណៈ

- ធានាថា មានការបង្ហាញព័ត៌មានពេញលេញ និងជាបន្ត-បន្ទាប់ ពាក់ព័ន្ធការគ្រប់គ្រងទ្រព្យសម្បត្តិសាធារណៈ ដូចជា ព្រៃឈើ ដីធ្លី ប្រេង និងឧស្ម័ន ស្រទាប់រ៉ែ មច្ឆា តំបន់កើ្តមរតក និងអាគារគ្រប់គ្រងដោយរដ្ឋ ។
- ធានាថា ព័ត៌មាននេះ រួមមានដូចខាងក្រោមនេះ : កិច្ចព្រមព្រៀងវិនិយោគ លក្ខខណ្ឌកិច្ចសន្យា និងស្ថានភាពអនុវត្តតាម (ការបំពេញការវាយតម្លៃផលប៉ះពាល់បរិស្ថាន និងសង្គមតាមតម្រូវចិត្ត[ESIAs] ការបង់សួយសារ ។ល ។) ការរុករក ការធ្វើអាជីវកម្ម ការដឹកជញ្ជូន និងប័ណ្ណអនុញ្ញាតនាំចេញដែលបានផ្តល់ឱ្យ ឈ្មោះ និងលំអិតពីម្ចាស់ទទួលប្រយោជន៍របស់ក្រុមហ៊ុនពាក់ព័ន្ធ ។

## ៥. ពង្រឹងក្របខណ្ឌច្បាប់គ្រប់គ្រងការគ្រប់គ្រងទ្រព្យសម្បត្តិសាធារណៈ

- បញ្ចូលក្នុងពង្រាងច្បាប់ប្រឆាំងអំពើពុករលួយនូវ ២ ចែង ដូចខាងក្រោមនេះ :
  - មាត្រាដែលធានាសិទ្ធិពលរដ្ឋខ្មែរ ក្នុងការទទួលបានប្រភេទព័ត៌មានស្តីពីការគ្រប់គ្រងទ្រព្យសម្បត្តិសាធារណៈ ដែលមានរាយខាងលើ ។
  - ការហាមប្រាមបុគ្គល ឬក្រុមហ៊ុនដែលមានកំណត់ត្រាសកម្មភាពខុសច្បាប់ពីការគ្រប់គ្រងទ្រព្យសម្បត្តិសាធារណៈគ្រប់ប្រភេទ ។
  - តម្រូវការថា គ្រប់កិច្ចសន្យាទាំងអស់រវាងរដ្ឋាភិបាល និងក្រុមហ៊ុនពាក់ព័ន្ធការគ្រប់គ្រង ការរុករក ឬការធ្វើអាជីវកម្មធនធានធម្មជាតិ និងទ្រព្យសម្បត្តិសាធារណៈផ្សេងទៀត ប្រព្រឹត្តតាមដំណើរការ ស្នើសុំជាចំហ ដែលធ្វើឡើងស្របតាមការអនុវត្តប្រសើរបំផុតជាអន្តរជាតិ ។
  - តម្រូវការដែលថារាល់ប្រតិបត្តិករវិស័យឯកជនទាំងអស់ ដែលគ្រប់គ្រងសម្បទានទ្រព្យសម្បត្តិសាធារណៈ បង្ហាញជាប្រចាំឆ្នាំនូវការចំណាយ ដែលពួកគេបង់ឱ្យរដ្ឋាភិបាល ក្នុងទម្រង់ជា ពន្ធដារ សួយសារ ប្រាក់រង្វាន់ពីការចុះហត្ថលេខា ។ល ។
  - តម្រូវការដែលថា រាជរដ្ឋាភិបាលកម្ពុជា បង្ហាញជាប្រចាំឆ្នាំនូវលំអិតរាល់ពន្ធអាករ សួយសារ ប្រាក់រង្វាន់ពីការចុះហត្ថលេខាទាំងអស់ ។ល ។ ដែលទទួលពីការផ្តល់សម្បទានទ្រព្យសម្បត្តិសាធារណៈ ។
  - តម្រូវការដែលថា រដ្ឋាភិបាលរក្សាការចុះបញ្ជីផលប្រយោជន៍អាជីវកម្ម និងទ្រព្យសម្បត្តិផ្ទាល់ខ្លួនរបស់មន្ត្រីជាន់ខ្ពស់ ដែលមានការផ្លាស់ប្តូរឱ្យបានទៀងទាត់ និងទទួលបានជាសាធារណៈ ក៏ដូចជារបស់សមាជិកគ្រួសាររបស់ពួកគេផងដែរ ។
- អនុម័ត និងអនុវត្តពង្រាងច្បាប់នេះ ដោយមិនមានការពន្យារបន្ថែមទៀត ។

## ៦. ធានាពីការគ្រប់គ្រងមានតម្លាភាពនៃប្រាក់ចំណូលប្រេង និងឧស្ម័ន

- អនុវត្តវិធានការណ៍គ្រប់គ្រងប្រាក់ចំណូលដែលបានកំណត់ក្នុងទិសដៅណែនាំរបស់មូលនិធិរូបិយវត្ថុអន្តរជាតិ ស្តីពីតម្លាភាពប្រាក់ចំណូលពីធនធាន[10] ។
- ចូលរួមជាមួយគំនិតផ្តួចផ្តើមតម្លាភាពឧស្សាហកម្មចម្រាញ់[11] ។

## ៧. កែទម្រង់កងយោធពលខេមរភូមិន្ទ (RCAF)

- ដកចេញនូវកងយោធាទាំងអស់ ដែលមានទីតាំងនៅក្នុង ឬលើព្រំដែនតំបន់ការពារ ។
- បង្ហាញពីទីតាំង និងស្ថានភាពច្បាប់របស់តំបន់អភិវឌ្ឍន៍យោធាទាំងអស់ ។ បញ្ឈប់រាល់តំបន់ទាំងឡាយណាដែលមានទីតាំងនៅលើព្រៃក្នុងតំបន់ការពារ ឬបើពុំនោះផ្ទុយនឹងច្បាប់ដែលមានស្រាប់ ។
- បដិសេធច្បាប់កេណ្ឌទ័ណដែលបានណែនាំនាពេលថ្មីៗនេះ និងបន្តរៀបចំរចនាសម្ព័ន្ធកងយោធពលខេមរភូមិន្ទឡើងវិញឱ្យបានទូលំទូលាយ ដើម្បីបង្កើតកម្លាំងយោធាជំនាញ ដែលបំពេញតាមតម្រូវការការពាររបស់ប្រទេសកម្ពុជា ។

## ម្ចាស់ជំនួយអន្តរជាតិរបស់ប្រទេសកម្ពុជាត្រូវតែ :

### ១. ប្រើប្រាស់ឥទ្ធិពលរបស់ពួកគេឱ្យបានសកម្ម ដើម្បីធានាថា ជំនួយផ្តល់អត្ថប្រយោជន៍ដល់ប្រជាជនខ្មែរសាមញ្ញ


ព្រៃឈើព្រៃឡង់របស់ប្រទេសកម្ពុជា

- ម្ចាស់ជំនួយគួរតែភ្ជាប់ការចំណាយជំនួយមិនមែនមនុស្សធម៌ទៅនឹងការរីកចម្រើន ដែលអាចពន្យល់បង្ហាញបានក្នុងការអនុវត្តវិធានការណ៍ដែលបានកំណត់ខាងលើ ស្របតាមគម្រោងពេលវេលាដែលបានបង្កើតឡើង ។

### ២. ដកការផ្តល់ជំនួយពីស្ថាប័នរដ្ឋដែលពាក់ព័ន្ធសកម្មភាពល្មើសធ្ងន់ធ្ងរ

- ដោយឡែកម្ចាស់ជំនួយមិនត្រូវផ្តល់មូលនិធិ ឬទម្រង់នៃជំនួយផ្សេងទៀត ឱ្យកងយោធពលខេមរភូមិន្ទ រហូតដល់កងយោធពលខេមរភូមិន្ទបញ្ឈប់ការចូលរួមរបស់ខ្លួនក្នុងបទល្មើសដែលបានរៀបចំឡើងក្នុងទ្រង់ទ្រាយធំ ។

### ៣. គាំទ្រកិច្ចខិតខំប្រឹងប្រែងរបស់សង្គមស៊ីវិលកម្ពុជា ដើម្បីបង្កើនទំនួលខុសត្រូវរដ្ឋាភិបាល

- ផ្តល់ជំនួយបន្ថែមដល់អង្គការកម្ពុជា ដែលធ្វើការបង្កើតទំនួលខុសត្រូវរដ្ឋាភិបាលពាក់ព័ន្ធការគ្រប់គ្រងទ្រព្យសម្បត្តិសាធារណៈ ។ ជាពិសេស បង្កើតសមត្ថភាពសង្គមស៊ីវិលក្នុងមូលដ្ឋាន ដើម្បីកត់ត្រា ត្រួតពិនិត្យ និងពិចារណាការគ្រប់គ្រងធនធានធម្មជាតិ និងទ្រព្យសម្បត្តិសាធារណៈផ្សេងទៀត និងធានាថា ការចំណាយវិស័យសាធារណៈមានតម្លាភាព ។ តនៅលេខក្រោយ

# Album រូបភាពនៅវត្តបាលីលេយ្យ

ថតនៅថ្ងៃទី១២ កក្កដា ឆ្នាំ២០១២

នៅវត្តបាលីលេយ្យក្រុងហ្វីឡាដែលហ្វៀ ផេនស៊ីវេនា នាឱកាសបុណ្យបញ្ចុះសីមា ផ្ដើមសង់ព្រះវិហារនៅលើដីថ្មីផ្លូវ៥៨ខាងត្បូងឈៀងខាងលិច ក្រោមអធិបតីភាពចៅអធិការ សែម សូឃឿន ក្នុងបរិយាកាសអធិកអធមរយៈពេលបីថ្ងៃបីយប់ ។



# នយោបាយមួយរាំស្នាពីរ

**ហ្វីឡាដែលហ្វៀ :** លោក ម៉ម សុណង់ដូនាយកប្រធានសំបុកឃ្មុំ បានរដ្ឋាភិបាលលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ចាប់ ដាក់ពន្ធនាគារពីបទជម្រុញឱ្យប្រជាពលរដ្ឋធ្វើអប្បគមន៍ កាលពីថ្ងៃទី១២ខែកក្កដា ឆ្នាំ២០១២ នៅពេលត្រឡប់ពីស្រុកបារាំងដែលលោកស្នាក់អាស្រ័យតាំងពីខែមិនា ឆ្នាំ២០១២មក ។ បាតុកម្មមួយនៅភូមិប្រម៉ា ខេត្តក្រចេះ បានផ្ទុះឡើងពីការរំលោភយកដីអ្នកភូមិតែរដ្ឋាភិបាលបានបង្ក្រាបយ៉ាងចាស់ដៃ បណ្ដាលឱ្យស្លាប់ម្នាក់ និងរបួស២នាក់ នឹង-ចាប់ខ្លួនអ្នកដឹកនាំដែលគេយល់ថា មកពីចលនាដែលលោក ម៉ម សុណង់ដូ បានបង្កើត។

RATHA SOURN

ម៉ម សុណង់ដូ ត្រូវប៉ូលិស

នាបីខែចុងក្រោយនេះ លោក ម៉ម សុណង់ដូ បានមកហ្វីឡាដែលហ្វៀ ២ដង ដើម្បីធ្វើការឃោសនានយោបាយជាមួយ សួន សេរីរដ្ឋា ។ តែថ្ងៃនេះយើងបានទទួលឯសារមួយចុះថ្ងៃទី២៥ខែមេសា ឆ្នាំ២០១០ ដែលអញ្ជើញលោក សួន សេរីរដ្ឋា ឱ្យធ្វើជាទីប្រឹក្សាផ្ទាល់របស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ឋានៈស្មើរដ្ឋមន្ត្រី ។

យើងមិនបានឮថា សួន សេរីរដ្ឋា ទទួលឬមិនទទួលការងារនោះនៅឡើយទេ យើងចងឮការបកស្រាយពីវាស្នាដ៏ខ្ពង់ខ្ពស់នេះ ជូនអ្នកអាននៅពេលឆាប់ៗខាងមុខនេះ ៕ **ដោយ : ខ្មែរប៉ុស្តិ៍**

# Album រូបភាពនៅវត្តខ្មែរឡូវែល

ផតថ្ងៃទី១៥ ខែកក្កដា ឆ្នាំ២០១២

នាឱកាសថ្ងៃបញ្ចប់កម្មវិធីបំបួសភិក្ខុ សាមណេ សាមណេរី ១២១អង្គ ចំនួនមួយអាទិត្យនៅវត្តខ្មែរក្រុងឡូវែល-ម៉ាសាឈូសែត ដឹកនាំដោយព្រះសង្ឃាធិបតី សៅ យន ធម្មត្ថេរោ ។


ថ្នាក់ដឹកនាំរីករាយនៅពេលចប់កម្មវិធី


ព្រះគ្រូចៅអធិការ សៅ យន ជាឧបជ្ឈា


ចប់កម្មវិធីបំបួស សាមណេរ មិនទាន់ចង់សឹកនៅឡើយ

# វិធីបន្ធូរនិងលំហែកាយនិងចិត្ត និងក្រេបជញ្ជក់រស់ជាតិជីវិត

# Method how to relax mind and body in order to enjoy life.



**តពីលេខមុន**

ចូរអ្នកសំឡឹងមើលងាកទៅក្រោយវិញ ពិសោធន៍បែបនេះ មានច្រើនរាប់មិនអស់ ។ មនុស្សយើងគ្រប់គ្នា ពុំលើកលែងនរណាឡើយ យើងរស់នៅតែជាមួយនឹងអតីតកាល ការស្រមៃរឿងដើម រឿងរ៉ាវចាស់ៗពីមុនមក ឬនឹកស្រមៃទៅអនាគតកាលថា ខ្លួននឹងទៅជាយ៉ាងនេះ ឬយ៉ាងនោះ ចំណែកឯហេតុការណ៍នាពេលបច្ចុប្បន្នទុកចន្លោះចោលអ្នកប្រាជ្ញបូរាណតែងដាស់តឿនប្រៀនប្រដៅថា ចូរភ្ញាក់ឡើង ចូលពិសោធន៍ការត្រាស់ដឹងនាពេលនេះខណៈនេះ ។

៣- ពិសោធន៍វេទនាពហុញ្ញាណដោយផ្ទាល់ Direct multi sensual sensation experiences:

ដូចខ្ញុំបានរាយរ៉ាប់អំពីកុមារអាយុកន្លះឆ្នាំឬមួយឆ្នាំខាងលើស្រាប់ ក្មេងនេះពិសោធន៍វេទនាពហុញ្ញាណដោយផ្ទាល់ មានន័យថា គេពិសោធន៍វេទនាពហុញ្ញាណដោយពុំឆ្លងតាមរយៈខួរក្បាល ម៉េម៉ូរី ការចងចាំ ការគិតពិចារណា ការវិភាគ ការប្រៀបធៀប វាយតម្លៃសារុបទស្សនៈឡើយ ។ មានន័យថា ការពិសោធន៍ វេទនាពហុញ្ញាណទាំងនោះ ប្រព្រឹត្តទៅក្នុងលំហរ សតិដឹងដោយផ្ទាល់ក្នុងលំហរចិត្តបរិសុទ្ធដោយផ្ទាល់ក្នុងធម្មជាតិពិតរបស់មនុស្សដោយផ្ទាល់ ក្នុងបណ្តូលមនុស្សតែម្តង The experiences manifest beyond human mind and body ។ ចលនាការគិតគូរប្រតិកម្មនានាតាមរយៈខួរក្បាលពុំចូលលាយឡំឡើយ ។ ការរស់ក្នុងភាពសាមញ្ញធម្មតា តើអាចមានពិសោធន៍វេទនាពហុញ្ញាណដោយផ្ទាល់ ដូច្នេះឬទេ? បាទពិតជាមានរាល់ពេល ប៉ុន្តែយើងពុំបានយកចិត្តទុកដាក់សង្កេត ឬចាប់ភ្លឹកដល់ ។ ខ្ញុំសូមលើកឧទាហរណ៍តូចៗ ជាគតិដូចតទៅ :

**ពិសោធន៍ភ្ញាក់ពីដេក :** ពេលព្រលឹមភ្ញាក់ពីដេកភ្លាមៗ មួយប៉ព្រិចភ្នែក យើងមានអារម្មណ៍ ស្រឡះស្រឡៃង សប្បាយរីករាយសប់ ធូរស្រាល ពេលនេះយើងជាជនសាកល ជាជនគ្មានឈ្មោះ ជាជនគ្មានអតីតកាល គ្មានអនាគត ជាជនគ្មានអត្តសញ្ញាណ នេះហៅថា ការពិសោធន៍វេទនាពហុញ្ញាណដោយផ្ទាល់ ។ លុះវិនាទីបន្ទាប់មក ម៉េម៉ូរី ការចងចាំបានហូរចូលមកក្នុងខួរក្បាលដូចទឹកបាក់ទំនប់ យើងមានអារម្មណ៍នឹកឃើញរឿងរ៉ាវនានាដែលត្រូវដោះស្រាយថ្ងៃនេះ និងទៅមុខ។ ខ្សែគំនិតនានាផុះឡើង ការប្រតិកម្មពិសោធន៍ភ័យព្រួយ អររំភើប ខឹងផុះឡើង នេះហៅថា ពិសោធន៍វេទនាពហុញ្ញាណដោយពុំផ្ទាល់ ។

**ពិសោធធំខ្លិន :** ពេលយើងធំក្លិនអ្វីមួយគួរសង្កេតថា មានពីរដំណាក់កាល ឧទាហរណ៍ ធំខ្លីនផ្សែងបារី (1) យើងធំក្លិនញាណដែលកើតពីច្រមុះថា មានក្លិនជាដំណាក់កាលដំបូងបង្អស់ នេះជាពិសោធន៍វេទនាពហុញ្ញាណដោយផ្ទាល់យើងជាម្ចាស់ខ្លួន ពុំចាំបាច់ហៅរកខួរក្បាលមកបញ្ជាក់ហេតុការណ៍ធំក្លិនដែលកើតឡើងឯងៗនេះឡើយ យើងពុំបង្កើតវាឡើយ វាកើតឡើងឯងៗយើងម្ចាស់ខ្លួនគ្រាន់តែបង្វែសតិដឹងទៅទីនោះ ក្លិននឹងមកដល់ដោយឯកឯងពុំមានការបង្កើតឬខំប្រឹងឡើយ ។(2)បន្ទាប់មក ម៉េម៉ូរី ការចងចាំពីមុនៗបានផ្តល់ព័ត៌មានថា នេះជាក្លិនបារី ហើយវាបញ្ជាក់ថាជាបារីបែបនេះ ឬបែបនោះយ៉ាងលំអិតទៀតផង។ នេះជាពិសោធន៍វេទនាពហុញ្ញាណដោយពុំផ្ទាល់ទៅវិញ។

ពិសោធន៍វេទនាពហុញ្ញាណ វេទនាលើរូបកាយ Body sensations

បើទំលាក់សតិពីខួរក្បាលចុះមកលើរូបកាយអ្នកនឹងពិសោធន៍វេទនាទាំងឡាយលេចឡើងមួយរំពេចដូចជា ដំណើរបេះដូងចលនាទ្រូងឡើងចុះ ពោះប៉ោងផតកូពោះ ស្ពឹកត្រង់នេះត្រង់នោះ ឈឺឈាបៗ ឈឺចង្កេះរួយស្មារ ចុកសន្លាក់ដៃជើង ដង្ហើមចេញចូលត្រជាក់ត្រង់នេះ ក្តៅត្រង់នោះ ញ័រសាច់ ព្រឹលភ្នែក រួយករ ។ល។ ពិសោធន៍វេទនាពហុញ្ញាណបែបនេះមានលក្ខណៈដោយផ្ទាល់ ពីព្រោះ (1) អ្នកដឹងដោយផ្ទាល់ពុំចាំបាច់ប្រើខួរក្បាលរិះរកឡើយ (2)ពេលអ្នកបង្វែសតិទៅទីនោះ វេទនារូបកាយផុះឡើងដោយឯកឯង អ្នកពុំបង្កើតវាឡើយ អ្នកពុំចាំបាច់ធ្វើអ្វីឡើយ វាកើតឡើងឯកឯង ។ គួរកត់សំគាល់ថា បើឈឺចង្កេះ អ្នកគ្រាន់តែដឹងថា ឈឺបានហើយ ពិសោធន៍ដោយផ្ទាល់ (ពិសោធន៍ក្នុងលំហរសតិដឹង) តែបើអ្នកចាប់មានអារម្មណ៍ភ័យព្រួយថា មានជម្ងឺដែលអាចរីកធំឡើងពេលនេះខួរក្បាលជ្រៀតជ្រែកមក ហើយពេលនេះពិសោធន៍បានក្លាយទៅជាពិសោធន៍វេទនាពហុញ្ញាណពុំផ្ទាល់ទៅវិញ ។

ការពិសោធន៍វេទនាពហុញ្ញាណដោយផ្ទាល់នាំឱ្យយើងជាម្ចាស់ខ្លួន បានពិសោធន៍ធម្មជាតិ ពិតរបស់ខ្លួនឱ្យបានទៅដល់លំហរចិត្តបរិសុទ្ធឱ្យទៅដល់ដំបន់លំហរនៃសតិដឹងដែលឋិតនៅហួសផុតអំពីកិច្ចការខួរក្បាល ម៉េម៉ូរី ការចងចាំពីមុន ការគិតពិចារណា ការប្រតិកម្មនានា គឺទីនេះហើយមនុស្សយើងនឹងពិសោធន៍ចេញផុតពីទុក្ខព្រួយសព្វយ៉ាងប្រចាំថ្ងៃ សំរួលលំហែរកាយនិងចិត្ត Relax ភាពស្ងប់ សន្តិភាពផ្លូវចិត្ត ប្រាជ្ញភ្លឺថ្លាភាពសប្បាយរីករាយ ជានាពីរោគ ផ្លូវចិត្ត ការរួចរំដោះពីចិត្តអពមង្គល សីលធម៌ មេត្តា ករុណា សុភង្គលក្នុងជីវិត ។

ឧទាហរណ៍ជាក់ស្តែង បើអ្នកកំពុងត្រូវបានក្បៀបសង្កត់ពីអារម្មណ៍ភ័យរន្ធត់ ទុក្ខសោក សង្រេង តើគួរធ្វើយ៉ាងណាដើម្បីអាចចេញផុតពីភាពតឹងតែងនេះ? ចូរអ្នកបង្វែរសតិមកដងខ្លួន ឬទម្លាក់សតិពីខួរក្បាលមកលើដងខ្លួនភ្លាមដោយទទួលដឹងរាល់វេទនាទាំងឡាយដែលកំពុងតែផុះឡើងជាស្វ័យប្រវត្តិពិតៗ និងជាក់ស្តែង ។ **តទៅលេខក្រោយ**

## នាទី ប្រវត្តិសាស្ត្រ

# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**តពីលេខមុន**

**១០សីហា :** នៅកំពង់ឆ្នាំង ជនវៀតណាម ៦ រូប ក្នុងនោះមានក្មេងពារូបបានត្រូវខ្មែរក្រហមសម្លាប់ ។

**២៧សីហា :** ក្រុមប្រឹក្សាសន្តិសុខ អ.ស.ប ប្រកាសបន្តអាណត្តិ អ៊ុនតាក់ រហូតដល់ធ្វើរដ្ឋមនុញ្ញ ហើយបុគ្គលិកអ៊ុនតាក់ត្រូវចេញពី កម្ពុជានៅថ្ងៃ ១៥ វិច្ឆិកា

**២៦សីហា :** មានក្រុមខ្មែរក្រហមច្រើនរយនាក់ រួមទាំងទាហាន ខ្លះថែមទៀត បានធ្វើការចុះចូលតាំងពី២សប្តាហ៍មកហើយ

**៨-៩កញ្ញា:** កិច្ចប្រជុំសន្និសីទក្រុងប៉ារីសស្តីអំពីរូបមន្តសម្រាប់កសាងជាតិប្រទេស៣១ និងអង្គការអន្តរជាតិសន្យាផ្តល់ថវិកា១១៩លានដុល្លារ ដែលជាថវិកាបន្ថែមពី៨៨០លានដុល្លារអនុម័ត កាលពីនៅតូក្យូឆ្នាំ១៩៩២ សហរដ្ឋមន្ត្រីហិរញ្ញវត្ថុ គៀត ឆុន និង សម រង្ស៊ី បានធ្វើឱ្យអង្គប្រជុំចាប់អារម្មណ៍ជាខ្លាំង

**៩កញ្ញា:** ស្ពានជ្រោយចង្វាដែលបាក់កាលពីឆ្នាំ១៩៧២ត្រូវសង់ឡើងវិញរួចហើយ

**១៥កញ្ញា:** សហនាយករដ្ឋមន្ត្រីខ្មែរបានស្នើទៅរដ្ឋាភិបាលថៃឱ្យអាចជម្លៀសយោធាខ្មែរ៩៦៣នាក់ ពីជំរំសុខសាន្តតាមប្រទេសថៃតែថៃបដិសេធ -ជំរុំសុខសាន្តស្ថិតនៅចំណុចហ៊ុំព័ទ្ធដោយតំបន់ខ្មែរក្រហមតែត្រូវពូក ប៉ុល ពត សម្លាប់ចោលទាំងអស់ ។

**១៦-២១ កញ្ញា :** ប្រជុំពិភាក្សា អនុម័តរដ្ឋធម្មនុញ្ញខ្មែរ ។ សភាធម្មនុញ្ញបានក្លាយជាសភាជាតិជាស្វ័យប្រវត្តិ ។ កិច្ចពិភាក្សារបស់សភាធម្មនុញ្ញបានត្រូវគេចាក់ផ្សាយបន្តបន្ទាប់ជាសាធារណនៅទីក្រុងដ៏ដូចជានៅតាមបណ្តាខេត្តនានា

**២២កញ្ញា :** បញ្ចប់បេសកកម្មវិទ្យុអ៊ុនតាក់ ។

**២៣កញ្ញា:** សម្តេចសីហនុត្រឡប់មកកម្ពុជាវិញ ។

**២៤កញ្ញា :** ប្រកាសឱ្យប្រើរដ្ឋធម្មនុញ្ញ -អត្ថបទរដ្ឋធម្មនុញ្ញបានត្រូវបង្ហាញជូនបណ្តាពលរដ្ឋខ្មែរដែលមកនៅកកកុញនាមុខព្រះបរមរាជវាំង -ព្រះប្រមុខរដ្ឋតែងតាំងទ្រង់នរោត្តមរណឫទ្ធិ ជានាយករដ្ឋមន្ត្រីទី១ និងលោក ហ៊ុន សែន ជានាយករដ្ឋមន្ត្រីទី២ -សច្ចាប្រណិធានរបស់សម្តេចនរោត្តមសីហនុដែលក្លាយជាព្រះមហាក្សត្រ -រីឯព្រះមហេសី មុនីនាថ ក្លាយជាព្រះមហាក្សត្រីយានី ។ សកម្មភាពនយោបាយនាថ្ងៃនោះ បានបញ្ចប់ជាស្ថាពរ តួនាទីនៃក្រុមប្រឹក្សាជាតិជាន់ខ្ពស់ CNS និងអាណត្តិរបស់អ៊ុនតាក់ ។

**ជ-រាជរដ្ឋាភិបាលកម្ពុជា**

**ប្រមុខ :** ព្រះមហាក្សត្រនរោត្តម សីហនុ

**១-**នៅពេលទទួលការតែងតាំងនាថ្ងៃ ២៩តុលា ១៩៩៣

**សមាសភាពមានដូចតទៅ :**

**-នាយករដ្ឋមន្ត្រីទី១** : នរោត្តម រណឫទ្ធិ
**-នាយករដ្ឋមន្ត្រីទី២** : លោក ហ៊ុន សែន
**-ឧបនាយករដ្ឋមន្ត្រី** : នរោត្តម ស៊ីរីវុឌ្ឍ
**-ឧបនាយករដ្ឋមន្ត្រី** : ស ខេង
**-ទេសរដ្ឋមន្ត្រី** : អ៊ុង គាត
**-ទេសរដ្ឋមន្ត្រី** : គាត ឆុន
**-ទេសរដ្ឋមន្ត្រី** : អ៊ុង ផន
**-ទេសរដ្ឋមន្ត្រី** : វណ្ណ ម៉ូលីវណ្ណ
**-ទេសរដ្ឋមន្ត្រី** : ចែម ស្ងួន
**-ទេសរដ្ឋមន្ត្រី** : សម រង្ស៊ី
**-រដ្ឋមន្ត្រីអមទីស្តីការគណរដ្ឋមន្ត្រី:** វេង សេរីវុឌ្ឍ
:សុខ អាន
**-រដ្ឋលេខាធិការ** : ស៊ុំ ម៉ានិត
: ទូវ កាណុន
**-រដ្ឋលេខាធិការបរិស្ថាន** : ម៉ុក ម៉ារ៉េត
**-រដ្ឋលេខាធិការអភិវឌ្ឍន៍ជនបទ:** ហុង ស៊ុនហ៊ួត
**-រដ្ឋលេខាធិការទាក់ទងជាមួយសភា:** សាយ បូរី
**-រដ្ឋលេខាធិការក្រសួងកិច្ចការនារី:** គាត សុគន្ធ
**-រដ្ឋមន្ត្រីការបរទេស និងសហប្រតិបត្តិការអន្តរជាតិ:** នរោត្តមសេរីវុឌ្ឍ
**-រដ្ឋលេខាធិការ** : អ៊ុច គីមអន
**-រដ្ឋមន្ត្រីការពារជាតិ** : ទា បាញ់
: ទា ចំរ៉ាត់
**-រដ្ឋលេខាធិការ** : ឯក សេរីវុឌ្ឍន៍
: ចាយ សាំងយុន
**-រដ្ឋមន្ត្រីមហាផ្ទៃ** : ស ខេង
: យូ ហុកគ្រី
**-រដ្ឋលេខាធិការ** : ខាន់ សាវឿន
: អ៊ឹម ឈុនលឹម
**-រដ្ឋមន្ត្រីសេដ្ឋកិច្ច និងហិរញ្ញវត្ថុ:** សម រង្ស៊ី
**-រដ្ឋលេខាធិការ** : ចម ប្រសិទ្ធ
**-រដ្ឋមន្ត្រីព័ត៌មាន** : អៀង មូលី
**-រដ្ឋលេខាធិការ** : ខៀវ កាញារិទ្ធ
**-រដ្ឋមន្ត្រីសាធារណការ និងដឹកជញ្ជូន:** អ៊ុង គាត
**-រដ្ឋមន្ត្រីកសិកម្ម,រុក្ខា និងនេសាទ:** គង់ សំអុល
**-រដ្ឋលេខាធិការ** : តាវ សេងហួ
**-រដ្ឋមន្ត្រីយុត្តិធម៌** : ចែម ស្ងួន
**-រដ្ឋលេខាធិការ** :ហេង វង្សប៊ុនឆាត
**-រដ្ឋមន្ត្រីអប់រំ-យុវជន និងកីឡា:** អ៊ុង ហួត
**-រដ្ឋលេខាធិការ** : ម៉ុម ជីមហ៊ុយ
**-រដ្ឋមន្ត្រីពាណិជ្ជកម្ម** : វ៉ា ហួត
**-រដ្ឋមន្ត្រីឧស្សាហកម្ម-ថាមពល និងរ៉ែ:** ពូ សធីរៈ
**-រដ្ឋមន្ត្រីផែនការ** : ជា ចាន់តូ
**-រដ្ឋមន្ត្រីសុខាភិបាល** : ឈា ថាំង
**-រដ្ឋលេខាធិការទេសចរណ៍** : វេង សេរីវុធ
**-រដ្ឋលេខាធិការ និងសាសនា** : ហ៊ាន វណ្ណរត្ន
**-រដ្ឋលេខាធិការប្រៃសណីយ៍ និងទូរគមនាគមន៍** :សូឃុន
**-រដ្ឋលេខាធិការវប្បធម៌ និងវិចិត្រសិល្បៈ:**នុត ណារ៉ាង
**-រដ្ឋលេខាធិការការងារ និងសង្គមកិច្ច:** ស៊ុយ សែម
**-ទេសាភិបាលធនាគារជាតិ** : ថៅ ប៉េងលាត
**-ទេសាភិបាលរង** : អ្នកស្រី ផ្ញូឡុង សូម៉ូរ៉ា

**តទៅលេខក្រោយ**




# ពុទ្ធប្បវត្តិអមដោយរូបភាព

- រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- បកប្រែជាភាសាអង់គ្លេស ដោយ ហ្សឹត .អេ.លី
- ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

**២១២**-កាលដែលព្រះបរមរាជាព្រមទាំងប្រជារាស្ត្រក្នុងនគរកុសិនារាជ្រាបដំណឹងនេះពីអានន្ទថា ព្រះបរមសាស្ត្រាទ្រង់ហៀបនឹងចូលនិព្វានដូច្នោះហើយ ជនទាំងឡាយទួញយំសោយសោយខ្សឹកខ្សួលស្តាយស្រណោះអាឡោះអាល័យព្រះអង្គគ្រប់ៗគ្នានិយាយថា: "មិនគួរណាព្រះបរមគ្រូនៃយើងឆាប់ចូលនិព្វាន ដូច្នេះសោះ ។ លោកនេះនឹងត្រូវអស់ពន្លឺរស្មីប្រែទៅជាងងឹតសូន្យសុងហើយ! ។ ទាំងបុរសស្ត្រីនិងកុមារតូចធំយំសោកសង្រេងសំឡេងខ្លាំងៗ នាំគ្នាពពាក់ពពូនចូលទៅកាន់ព្រៃសាលវ័នជាកន្លែងដែលព្រះអង្គកំពុងគង់នៅ ដោយសង្ឃឹមថា ឱ្យបានឃើញព្រះពុទ្ធអង្គចុងក្រោយម្តងទៀត និងថ្វាយបង្គំសម្តែងការសោកស្តាយចំពោះព្រះអង្គ ។ មនុស្សម្នាទាំងឡាយនាំគ្នាទៅមើលព្រះអង្គជាពួកជាក្រុមតាមលំដាប់លំដោយហូរហែរតៗគ្នាមិនដាច់ ។ យ៉ាងណាក៏ដោយគ្មានជនណាម្នាក់ចង់ឃ្លាតចាកចេញពីព្រះអង្គឡើយ ។

**២១៣**-មានបុរសវ័យក្មេងដែលធ្វើដំណើរផ្លូវឆ្ងាយម្នាក់នៃពួកអ្នកកាន់ជំនឿដទៃ ឈ្មោះ សុភទ្ទ បានទៅដល់នគរកុសិនារា ។ កាលបើគាត់បានឮថា ព្រះពុទ្ធជិតនឹងចូលនិព្វានដូច្នោះ គាត់ក៏សម្រេចចិត្តទៅជួបព្រះអង្គដើម្បីទូលសួរព្រះអង្គនូវបញ្ហាមួយចំនួនដែលចេះតែធ្វើឱ្យគាត់តប់ប្រមល់ខ្វល់ខ្វាយយូរមកហើយៗ គាត់ជឿថាមានតែព្រះពុទ្ធប៉ុណ្ណោះ ដែលអាចពន្យល់ឱ្យគាត់យល់ច្បាស់លាស់បាន ។ សុភទ្ទ ក៏ធ្វើដំណើរទៅកាន់ឧទ្យានសាលវ័ន ហើយក៏សុំសេចក្តីអនុញ្ញាតពីព្រះអានន្ទ ដើម្បីបានជួបនឹងព្រះពុទ្ធទូលសុំបង្គំឱ្យព្រះអង្គទ្រង់ឆ្លើយបំភ្លឺបញ្ហាទាំងឡាយរបស់គាត់មុននឹងព្រះអង្គចូលកាន់ព្រះបរមនិព្វាន ។

**២១៤**-អានន្ទនិយាយឃាត់គាត់ថា ទេ ! ទេ ! មិនបានទេ សុភទ្ទ ! ព្រះពុទ្ធជាម្ចាស់ ព្រះអង្គទ្រង់អស់កម្លាំងខ្លាំងណាស់. ពេលនេះអ្នកមិនត្រូវទៅរំខានព្រះអង្គដោយប្រការណាមួយឡើយ" ។ ប៉ុន្តែសុភទ្ទមានចិត្តអន្ទះសារចង់ជួបព្រះពុទ្ធជាពន់ពេក ។ គាត់ខំទទូចអង្វរម្តងហើយម្តងទៀត ចំណែកព្រះអានន្ទបដិសេធរាល់លើក ដោយសំអាងលើសភាពការណ៍ពិតដែលថា ព្រះពុទ្ធអង្គទ្រង់ប្រឈួនយ៉ាងខ្លាំងមិនគួរឱ្យមានអ្នកណាម្នាក់មករំខានព្រះអង្គឡើយ ។ ប៉ុន្តែពេលដែលព្រះបរមគ្រូជាម្ចាស់ទ្រង់ឮអ្នកទាំងពីរនិយាយគ្នាព្រះអង្គទ្រង់ដឹងពីបំណងរបស់សុភទ្ទ ហើយក៏ទ្រង់ត្រាស់ឱ្យអានន្ទអនុញ្ញាតឱ្យគាត់ចូលមកជាប់ ។

**២១៥**-ព្រះពុទ្ធត្រាស់ប្រាប់អានន្ទថា: "ម្នាលអន្ទន! ចូរអ្នកកុំឃាត់សុភទ្រឡើយ. គាត់ចង់ចូលមកហើយឱ្យចូលមកចុះ ។ អ្វីដែលគាត់ចងនោះគឺសួរតថាគត អំពីបញ្ហាខ្លះៗក្នុងការប្រតិបត្តិធមិ. គាត់ពុំមានបំណង់រំខានតថាគតដល់តិចតួចឡើយ ។ ឱវាទពន្យល់របស់តថាគតនឹងធ្វើឱ្យគេយល់បានភ្លាមៗមួយរំពេច" ។ ឮដូច្នេះ អានន្ទក៏អនុញ្ញាតឱ្យសុភទ្ទចូលជួបព្រះអង្គ ដើម្បីទូលសួរបញ្ហាទាំងពួង ។ **តទៅលេខក្រោយ**

- Original Illuatration and Naration in Thai by Gunapayuta.
- Translation into English by A Lu.
- Coloring by Yann Fang Lee
- Translation into Khmer by Bhikkhu Kong Am.

212-When the King and people of Kusinagara learned from Ananda that the Buddha was about to enter Nirvana, they all wept sadly and said: "it is too early for the Buddha to enter Nirvana. Too soon is extinguished the light of the world!" Lamenting men, women and children flocked to Salavana, where the Buddha was staying, hoping that they might see the Buddha once more and express their concen for him. People visited the Buddha in groups is an orderly manner. Everybody was unwilling to leave him however.

213-An itinerant young man of a heretical cult, whose name was Subhadra, happened to be in Kusinagara on that time. When he learned the Buddha was about to enter Niravana, he decided to visit him in order to ask him some question that had been bothering him and he believed that only the Buddha would be able to give him a thorough explanation. Subhadra went to Salavana and asked Ananda for permission to see the Buddha in order to have his question answered before the Buddha entered Niravana.

214-Ananda said to him "No, No! Subhadra ! The Buddha is very tired, you must not bother him with any question now." But Subhadra was very anxious to see the Buddha. He pleased again and again, and Ananda rejected him again and again, holding to the fact that the Buddha was very ill and should not be bothered by anyone. But when the Buddha heard them both talking, he knew Subhadra´s intention and ordered Ananda to let him come in.

215-The Buddha told ananda: " Ananda! Do not stop Aubhadra, let him come in as he wishes. What he wants is to ask me about some problems he has in practicing the Buddha-dharma, he does not mean to disturb me with meaningless trifles. My explanations will make him understand immediately." So Ananda permitted Subhadra to go in to see the Buddha and ask his questions.

Contiue next issue

តមកពីទំព័រទី ១

## ប្រវត្តិថ្មីនៃបក្សប្រឆាំងទាំងពីរ...

ទាំងនេះបានបញ្ជាំងឱ្យអ្នកតាមដានព្រឹត្តិការណ៍នយោបាយកម្ពុជា ក៏ដូចជាអ្នកស្នេហាប្រជាធិបតេយ្យទាំងក្នុង និងក្រៅប្រទេសបានសម្តែងនូវក្តីត្រេកអរយ៉ាងខ្លាំង ។ ប៉ុន្តែទោះជាយ៉ាងនេះក្តីគេក៏នៅចងចាំបានយ៉ាងច្បាស់ថា គណបក្សទាំងពីរក៏ធ្លាប់បានប្រកាស និងចុះហត្ថលេខាបង្កើតសម្ព័ន្ធភាពរួមគ្នាមួយកាលពីថ្ងៃទី១៥ខែមករា ឆ្នាំ ២០០៩ ពោលគឺក្រោយពីការបោះឆ្នោតជាតិនាឆ្នាំ២០០៨ រួចមក ។ ប៉ុន្តែទីបំផុតចំណងសម្ព័ន្ធភាពនោះត្រូវបានប្រេះស្រាំជាបណ្តើរៗ និងទីបំផុតឈានដល់ការបែកបាក់គ្នាបន្ទាប់ពីការចាប់បដិសន្ធិទើបតែបានមួយឆ្នាំប៉ុណ្ណោះ ។

ជាការពិតណាស់ដែលថា "ក្រោយពីភ្លៀងមេឃស្រឡះ" រីឯបាតុភាពនៃធម្មជាតិ ក៏តែងតែមានការប្រែប្រួល និងផ្លាស់ប្តូរជាដរាបដែរ ។ មើលចុះផ្ទៃមហាសាគរដ៏ធំល្វឹងល្វើយគង់តែមានជោរ និងនាចជាក្រឹត្យក្រមនៃធម្មជាតិ រីឯរដូវកាល និងពេលវេលានៃការរស់រានមានជីវិតរបស់យើងរាល់ថ្ងៃ គឺតែងតែមានរនោច និងខ្មៅតជានិច្ច....។ យ៉ាងណាមិញសម្រាប់បក្សប្រឆាំងទាំងពីរដែលធ្លាប់តែវាយប្រហារគ្នានោះ ទីបំផុតក៏បានឈានដល់ស្រុះស្រួលមួយក្នុងគោលបំណងត្រៀមយកជ័យជំនះក្នុងការបោះឆ្នោតជាតិនាឆ្នាំ២០១៣ខាងមុខនេះ ។

ប៉ុន្តែសម្រាប់គណបក្សប្រឆាំងទាំងពីរក៏កំពុងប្រឈម និងបញ្ហាចម្បងមួយដែលនឹងអាចបាត់បង់អសនៈនៅឯសភាជាតិ ប្រសិនបើការរួបរួមគ្នានោះប្រើប្រាស់ឈ្មោះនយោបាយថ្មី ។ ម្យ៉ាងវិញទៀតសម្រាប់គណបក្ស សម រង្ស៊ី ជាពិសេស គឺលោក សម រង្ស៊ី ផ្ទាល់តែម្តងហាក់នៅមានបញ្ហាប៉ុនភ្នំកំពុងបាំង និងកំពុងរាំងដំណើរអាជីពនយោបាយរបស់លោក ព្រោះគេនៅចាំបានថា លោក សម រង្ស៊ី ត្រូវបានតុលាការកាត់ទោសកំបាំងមុខឱ្យជាប់ព័ន្ធនាគារចំនួន១៨ខែនៅឡើយ ។



រហូតមកដល់ពេលនេះលោក សម រង្ស៊ី កំពុងឃ្លាតកាយឆ្ងាយប្រាណពីប្រទេសកម្ពុជា ហើយកំពុងរស់នៅឯបរទេស ។ ដូច្នេះត្រង់ចំណុចនេះមានចំណួរជាច្រើនពីមជ្ឈដ្ឋានមហាជនខ្មែរថា: តើលោក សម រង្ស៊ី អាចវិលត្រឡប់ទៅកាន់ប្រទេសកម្ពុជា ដើម្បីបន្តអាជីពនយោបាយរបស់លោក សម រង្ស៊ី ឬយ៉ាងណា? ។ សម្រាប់លោក សម រង្ស៊ី ផ្ទាល់ធ្លាប់បានអះអាងប្រាប់អ្នកកាសែតថា "លោកនឹងវិលត្រឡប់ទៅកាន់ប្រទេសកម្ពុជាវិញ ដើម្បីធ្វើនយោបាយ និងចូលរួមបោះឆ្នោតនៅឆ្នាំ២០១៣"។

សម្រាប់លទ្ធផលនៃកិច្ចចរចារ នាទីក្រុងម៉ានីលប្រទេសហ្វីលីពីនកាលពីថ្ងៃទី១៦-១៧កក្កដា កន្លងមកនេះ គណបក្សប្រឆាំងទាំងពីរបានឯកភាព និងបានធ្វើសេចក្តីសម្រេចរួមចំនួន៥ចំណុច ដែលមានខ្លឹមសារជាអាទិ៍:

១-គណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សរួមកម្លាំងគ្នាតែមួយស្របតាមឆន្ទៈរបស់ប្រជាពលរដ្ឋខ្មែរ ដើម្បីសង្គ្រោះប្រទេសជាតិឱ្យទាន់ពេលវេលា តាមការផ្លាស់ប្តូរនយោបាយក្នុងគោលបំណងបញ្ចប់អំណាចផ្តាច់ការបច្ចុប្បន្នដែលបំរើបរទេសឈ្លានពាន ។

២-គណបក្សទាំងពីរសម្រេចរៀបចំបញ្ចូលគ្នាជាគណបក្សតែមួយ ដោយបង្កើតគណបក្សនយោបាយថ្មីមួយដែលនឹងមានការចូលរួមពីអ្នកប្រជាធិបតេយ្យដែលការពារផលប្រយោជន៍ជាតិពិតប្រាកដ ។

៣-គណបក្សទាំងពីរយល់ឃើញថា ការផ្លាស់ប្តូរការគ្រប់គ្រងប្រទេសកម្ពុជា ត្រូវប្រព្រឹត្តទៅដោយអហិង្សាតាមរយ:ការបោះឆ្នោតដោយសេរីត្រឹមត្រូវ និងយុត្តិធម៌ ។ ក្នុងន័យនេះគណបក្សទាំងពីរទាមទារដាច់ខាតឱ្យមានការផ្លាស់ប្តូរសមាសភាពគណកម្មាជាតិរៀបចំការបោះឆ្នោត និងឱ្យមានការកែតម្រូវនិតិវិធីដ៏ស្មុគស្មាញដែលបង្កការលំបាកដល់ប្រជាពលរដ្ឋក្នុងការបោះឆ្នោត ។

៤-គណបក្សប្រឆាំងក្នុងការបោះឆ្នោត ដើម្បីឱ្យការបោះឆ្នោតខាងមុខមានលក្ខណ:ត្រឹមត្រូវទទួលយកបាន ។ ក្នុងន័យនេះ គណបក្សទាំងពីរ ទាមទារឱ្យបញ្ឈប់ឱ្យប្រើប្រាស់ប្រព័ន្ធតុលាការមកគាបសង្កត់អ្នកនយោបាយស្នេហាជាតិ និងអ្នកការពារសិទ្ធិសេរីភាពប្រជាពលរដ្ឋ ។

៥-គណបក្សទាំងពីរឯកភាពគ្នាឱ្យមានកិច្ចសហការយ៉ាងជិតស្និទ្ធរវាងប្រធាន និងសមាជិកសមាជិការក្រុមប្រឹក្សាឃុំ-សង្កាត់ មកពីគណបក្សទាំងពីរ ក្នុងគោលបំណងផ្លាស់ប្តូររបៀបដឹកនាំឃុំ-សង្កាត់ឱ្យបានប្រសើរឡើង និងលើកតម្កើងលទ្ធិប្រចាធិបតេយ្យនៅថ្នាក់មូលដ្ឋាន ។

សូមជម្រាបផងដែរថា : ក្នុងខណ:ដែលគណបក្សប្រឆាំងទាំងពីរកំពុងរៀបចំបង្កើតគណបក្ស

តទៅទំព័រទី១៨

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា ស៊ីន សាន



**ដោយ : ម៉ម យ៉ឺន**

**(តពីលេខមុន)**

ស៊ីវិល និងយោធានយោបាយឱ្យនៅធ្វើការជាអ្នកជំនួយការនិងទីប្រឹក្សាបង្គាប់បញ្ជាឱ្យមេដឹកនាំ និងមន្ត្រីខ្មែរនិយមយួនទាំងអស់ត្រូវតែធ្វើតាមរបៀបគ្រប់គ្រងនៃរដ្ឋាភិបាលយួនក្រហមទាំងអស់ ។ ដូចនេះសន្មត់ថា មេដឹកនាំ និងមន្ត្រីខ្មែរគ្រប់ជាន់ថ្នាក់ដែលគ្រប់គ្រងប្រទេសជាតិខ្មែរនេះ គឺជាមេដឹកនាំនៃរដ្ឋាភិបាលយួនក្រហមទេ ដែលជាមេដឹនាំនោះ ។ រីឯមេដឹកនាំ និងមន្ត្រីខ្មែរ គឺគ្រាន់តែធ្វើតាមបង្គាប់បញ្ជាគេទេ ហើយ និងធ្វើជាខែលដើម្បីបិទបាំងកលល្បិចនៃរដ្ឋាភិបាលយួនវៀតណាមសង្គមនិយមតែប៉ុណ្ណោះ ជាហេតុធ្វើឱ្យមតិជនជាតិខ្មែរ និងមតិពិភពលោកមើលឃើញថា ប្រទេសកម្ពុជា និងជនជាតិខ្មែរបានស្ថិតក្រោមការដឹនាំ និងជនជាតិខ្មែរតែប៉ុណ្ណោះ ។

**ភាគទី១២**

**សេចក្តីប្តេជ្ញាចិត្តដ៏អង់អាចក្លាហានបំផុតរបស់សកម្មជន**

បញ្ហាធំៗដែលកើតមានពាសពេញនៅក្នុងប្រទេសខ្មែរ ក្រោមការដឹកនាំគ្រប់គ្រងរបស់ក្រុមខ្មែរនិយមយួននេះ បានចាត់ទុកជាគោលដៅសំខាន់បំផុត ដែលរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ និងកងទ័ពជាតិ ក.ជ.រ.ប.ខ ត្រូវតែផ្តោតចិត្តផ្តោតអារម្មណ៍យកចិត្តទុកដាក់យ៉ាងហ្មឹងម៉ាត់ជាដាច់ខាត ។ ដើម្បីរិះរកគ្រប់យុទ្ធវិធីដោះស្រាយខិតខំធ្វើយ៉ាងណាកុំឱ្យប្រទេសនឹងជនជាតិខ្មែរធ្លាក់ចូលទៅក្នុងគម្រោងផែនការប្រទេសយួនក្រហមនេះ ។

ដោយសារតែសច្ចាតាំងចិត្តយ៉ាងអង់អាចក្លាហាននេះ ទើបបណ្តាលឱ្យកងកម្លាំង ក.ជ.រ.ប.ខ បានរៀបចំសតិស្មារតីស្នេហាជាតិសារជាថ្មីឡើងវិញ ក្រោយពីត្រូវការវាយប្រហារដោយកងទ័ពខ្មែរ-យួននាឆ្នាំ ១៩៨៣-១៩៨៤ ដែលមានទ្រង់ទ្រាយធំយ៉ាងគគ្រឹកគគ្រេងនោះ ។ ទោះបីការវាយប្រហារនោះកងទ័ពខ្មែរ-យួនបានទទួលជ័យជំនះខ្លះមែនក៏ដោយ ប៉ុន្តែពុំទាន់សន្មត់ថា ឈ្នះជាស្ថាពរបានទេ។ ពីព្រោះកងកម្លាំង ក.ជ.រ.ប.ខ មិនបានត្រូវកងទ័ពខ្មែរ-យួនកំទេចអស់រលីងនោះទេ គឺកងកម្លាំង ក.ជ.រ.ប.ខ នៅតែមានជំហរយ៉ាងរឹងមាំដដែល ហើយកាន់តែខ្លាំងក្លាជាងមុនទៅទៀត ។ ដោយហេតុប្រទេសជួយគាំទ្រទាំងអស់គេនៅតែបន្តសន្យាថា ជួយឧបត្ថម្ភយ៉ាងពេញទំហឹង ហើយបន្ថែមឱ្យកាន់តែច្រើនជាងមុនទៅទៀត ទាំងផ្នែកស្បៀងអាហារ ថ្នាំពេទ្យ សម្លៀកបំពាក់ សម្ភារៈចំបាច់ក្នុងការប្រយុទ្ធ គ្រឿងអាវុធគ្រាប់រំសេវ គ្រប់ធុនគ្រប់ប្រភេទ ជាពិសេសខាងផ្នែកថវិកា ។

ដោយឃើញសេចក្តីសន្យារបស់ប្រទេសស្រឡាញ់យុត្តិធម៌ និងសន្តិភាពបានមកមេទ័ពទាំងអស់គ្រប់ជាន់ថ្នាក់នៃកងកម្លាំង ក.ជ.រ.ប.ខ និងយុទ្ធជនដ៏អង់អាចក្លាយហានទាំងអស់បានពង្រឹងសតិស្មារតីយ៉ាងរឹងមាំធ្វើឱ្យទឹកចិត្តប្រយុទ្ធទៅលើខ្មាំងសត្រូវបានកើនឡើងមួយកំរិតទៀត យ៉ាងខ្ពស់ជាងមុន ថែមទាំងបានប្តេជ្ញាក្នុងចិត្តថា និងវាយប្រយុទ្ធដណ្តើមយកជោគជ័យឱ្យបានមកវិញ ។ ដើម្បីជួយសង្គ្រោះនិងរំដោះប្រទេសខ្មែរឱ្យបានចេញរួចផុតពីកណ្តាប់ដៃយួនក្រហមដែលជាប្រទេសមានមហិច្ឆតាលោភលន់មានផែនការពង្រីកទឹកដីរបស់វា ដោយលេបយកទឹកដីខ្មែរ ។ ដូចជាប្រទេសយួនធ្លាប់រឹបអូសយកដែនដី និងជនជាតិខ្មែរកម្ពុជាក្រោម នាក្នុងសតវត្សទី ១៧នោះដែរ ។

ក្រោយពីបានរៀបចំនិងពង្រីកទឹកចិត្តនិងសតិស្មារតីក្នុងគោលជំហរយ៉ាងរឹងមាំថា ត្រូវតែវាយប្រយុទ្ធតបតទៅលើខ្មាំងសត្រូវឡើងវិញនោះ កងកម្លាំង ក.ជ.រ.ប.ខ បានចាត់ប្រើយុទ្ធសាស្ត្រថ្មី គឺបញ្ជូនកងកម្លាំង ក.ជ.រ.ប.ខ ជាក្រុមតូចៗឱ្យជ្រៀតចូលទៅក្នុងប្រទេសខ្មែរបន្តិចម្តងៗស្ថិតនៅគ្រប់តំបន់ក្នុងប្រទេសខ្មែរ-កម្ពុជាទាំងមូល ។

ក្រុមកងកម្លាំង ក.ជ.រ.ប.ខ តូចៗនេះមានសេចក្តីអង់អាចខ្លាំងណាស់ ហើយយុទ្ធវិធីល្អប្រសើរផង បានជ្រៀតចូលទៅរស់នៅយ៉ាងសម្ងាត់បំផុតជាមួយប្រជាពលរដ្ឋខ្មែរ ហើយធ្វើសកម្មភាពយ៉ាង



ត្រជាក់ត្រជុំដោយរៀបចំបណ្តាញស្នេហាជាតិគ្រប់វិស័យ ។ ដូចជាផ្នែកផ្តល់ព័ត៌មាន ផ្នែកផ្តល់ ស្បៀងអាហារ ផ្នែកជួយសង្គ្រោះ ជាពិសេសផ្នែកជួយលាក់និងការពារជីវិតកងកម្លាំង ក.ជ.រ.ប.ខ ។

ការរៀបចំយុទ្ធសាស្ត្រថ្មីនេះ បានប្រព្រឹត្តទៅប្រកបដោយជោគជ័យប្រសិទ្ធភាពខ្លាំងណាស់ បានបង្ហាញឱ្យឃើញថា ប្រជាពលរដ្ឋខ្មែរទូទាំងប្រទេសបានភ្ញាក់រឭក ហើយនិងដឹងយល់ពីគម្រោង និងផែនការពុតត្បុត និងកលល្បិតដ៏ខ្មៅកក្ខក់ខ្លាំងណាស់របស់យួនក្រហម វៀតណាម សង្គមនិយម ។

ដោយសារតែរៀបចំយុទ្ធសាស្ត្រថ្មីនេះ កងកម្លាំងខ្មែរ-យួនត្រូវទទួលការលំបាកច្រើនណាស់ ពីព្រោះចាប់តាំងពីពេលនោះមកគម្រោងវាយលុកធំៗ

**តទៅទលេខក្រោយ**



# វិធីធ្វើឲ្យសាច់បបូរមាត់ទន់ល្មើយ

●ជាការពិតវិធីសាច់បបូរមាត់ (បន្ទន់) មិនមែនធ្វើឡើងត្រឹមតែស្បែកមុខប៉ុណ្ណោះទេ ព្រោះការបន្ទន់លើស្បែកបបូរមាត់ក៏គេអាចធ្វើបានដូចគ្នាដែរ ហើយក៏ជាវិធីដែលស្ត្រីទូទៅមិនគួរមើលរំលងទៀតផង ។

វិធីនេះអាចធ្វើឱ្យសាច់បបូរមាត់របស់អ្នកមានសភាពទន់ល្មើយដោយសារសំណើមបានកាន់តែងាយហើយថែមទាំងអាចធ្វើវិធីស្តាប់នេះដោយខ្លួនឯងនៅផ្ទះទៀតផង ។



វិធីណែនាំ គឺប្រើទឹកឃ្មុំ ស្ករ.ស និងពីត្រូលៀមជេល មកលាយបញ្ចូលគ្នាក្នុងបរិមាណមួយដ៏សមរម្យរហូតដល់បានល្បាយខាប់មួយ ។ បន្ទាប់មកក៏ចាប់ផ្តើមដុសលាងសម្អាតសាច់បបូរមាត់ឱ្យស្រស់ស្អាត រួចហើយលាបល្បាយក្រែមដែលធ្វើបានទៅលើសាច់បបូរមាត់ ដោយប្រើម្រាមដៃឈ្លីលើបបូរមាត់ស្រាល១ រហូតដល់ជាតិស្កររលាយអស់ និងជ្រាបចូលបបូរមាត់ ។

ក្នុងករណីក្រែមនៅសេសសល់ណែនាំឱ្យប្រើសំឡីជ្រលក់ទឹក ហើយផ្តិតវាចេញដោយមិនបាច់លាងជម្រះចេញ ។ ការស្តាប់បន្ទន់ស្បែកបបូរមាត់នេះក្នុងមួយសប្តាហ៍ម្តង វានឹងធ្វើឱ្យស្ថានភាពស្បែកបបូរមាត់របស់អ្នកមានសភាពសំណើមល្អទន់ល្មើយ គួរឱ្យចង់ស្ទាបអង្អែល មិនស្ងួត មិនប្រេះបែក មិនរបក និងថែមទាំងសាច់បបូរមាត់មានពណ៌ស៊ីជម្ពូរស្រស់មិនជាំខ្មៅទៀតផង ៕

# 4 វិធីពីរបៀបបង្ហាប់រន្ធរោម

●សម្រាប់សុភាពស្ត្រីដែលមានស្ថានភាពរន្ធរោមរីកធំនោះ ជាបញ្ហាចម្បងមួយក្នុងការប្រើគ្រឿងសម្អាងលើស្បែកមុខ ព្រោះការសម្អិតសម្អាងមិនបានផលល្អទៅតាមបំណងប្រាថ្នា ។

រូបមន្តខាងក្រោមនេះ គឺជាវិធីងាយ១ក្នុងការយកទៅសាកល្បងជួយសំចៃថវិកា និងកត្តាដែលសំខាន់ជាងគេ គឺទទួលបានផលជាក់ស្តែង ប្រសិនបើព្យាយាមធ្វើជាប់ជាប្រចាំ ។



**ទីមួយ :** យកផ្លែប៉េងប៉ោះមកលាងទឹកឱ្យស្អាត បន្ទាប់មកចិតសម្បកចេញ រួចចិតជាចំណិត១ដើម្បីយកគ្រាប់ចេញ ។ រួចហើយយកសាច់ប៉េងប៉ោះដែលធ្វើបានទៅកិនក្រឡុកឱ្យម៉ដ្ឋ ឬក៏អាចប្រើដៃច្របាច់ឱ្យល្អិត ។ បន្ទាប់មកយកល្បាយសាច់ប៉េងប៉ោះនេះមកលាបលើស្បែកមុខឱ្យសព្វ ជាពិសេសត្រង់កន្លែងដែលមានលេចចេញរោគមុនមុខទុកចោលពី១០-១៥នាទី ទើបប្រើទឹកក្តៅឧណ្ហ១លាងជម្រះចេញជាការស្រេច ។

រូបមន្តនេះមានប្រសិទ្ធភាពជួយលាងសម្អាតរន្ធរោម និងកាត់បន្ថយអាការមុនបាន ។

**ទីពីរ :** ប្រើស៊ុតមាន់ ដោយចាប់ផ្តើមពីការលាងសម្អាតស្បែកមុខជាមុនសិន បន្ទាប់មកគោះពងមាន់ដាក់ទៅក្នុងចាន រួចបំបែកស៊ុត.សលាបនៅលើផ្ទៃមុខទុកចោល១០នាទី ។ បន្ទាប់មកប្រើទឹកក្តៅឧណ្ហ១លាងជម្រះ និងលាបឡេថែបំប៉នស្បែកតាមក្រោយភ្លាម១ ។

រូបមន្តនេះមានប្រសិទ្ធភាពជួយបង្ហាប់រន្ធរោម និងស្បែកបានល្អបំផុត ប្រសិនបើព្យាយាមធ្វើបានជាប់លាប់រៀងរាល់ថ្ងៃ ។

**ទីបី :** យកផ្លែចេកអំបូង ឬចេកណាំវ៉ាក៏បានដោយហាន់វាជាចំណិតតូច១រួចហើយបន្ថែមទឹកឃ្មុំ ឬទឹកដោះគោឆៅលាយជាមួយ ទើបកិនឱ្យម៉ដ្ឋក្លាយជាសាច់មួយ ។ បន្ទាប់មកយកល្បាយនេះលាបលើផ្ទៃមុខឱ្យសព្វទុកចោលរយៈពេល៣០នាទី ទើបប្រើទឹកក្តៅឧណ្ហ១លាងចេញ ។ រូបមន្តនេះជួយបង្ហាប់រន្ធរោម និងជួយលាងសម្អាតស្បែកមុខ ។

**ទីបួន :** ប្រើប្រាស់ត្រសក់ ១-២ចំណិត មកកិនឱ្យម៉ដ្ឋលាយជាមួយទឹកឃ្មុំ រួចយកមកលាបនៅលើស្បែកមុខឱ្យសព្វទុកចោលពី១៥-២០នាទី ឬក៏អាចរង់ចាំរហូតដល់វាស្ងួតក៏បានដែរ ។ រូបមន្តនេះជួយបកស្បែកមុខឱ្យ.ស នឹងជួយបង្ហាប់ស្បែកមុខឱ្យតឹងណែន ជាពិសេសជួយឱ្យស្បែក មានសំណើមល្អទៀតផង ៕

ជោគជតាប្រចាំសប្តាហ៍

# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំហាង

**ឆ្នាំជូត** ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវ ចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់១ចង់ចាញ់ឈ្នះ គ្នានោះឯង ៕

**ឆ្នាំថោះ** រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕

**ឆ្នាំមមី** លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាច រកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

**ឆ្នាំរកា** លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញគួរជួញដូរនៅទីជិត១ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

**ឆ្នាំឆ្លូវ** លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួល ដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

**ឆ្នាំរោង** នៅក្នុងរយៈពេលនេះលោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះ ក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញ ដូរផ្លូវឆ្ងាយ ប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

**ឆ្នាំមមែ** រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះ១នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹក នារដូវខែវស្សាដូច្នេះដែរ ៕

**ឆ្នាំច** រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមកហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណងហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងឃាឃីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

**ឆ្នាំខាល** អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញ ដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្តីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

**ឆ្នាំម្សាញ់** រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះសូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

**ឆ្នាំវក** រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះ សុទ្ធតែផ្តល់នូវអត្ថប្រយោជន៍គួរឱ្យជាទីពេញចិត្តទាំងអស់ គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀតនោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហា គូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕

**ឆ្នាំកុរ** លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ។

## តមកទំព័រទី ១៥ ប្រវត្តិថ្មីនៃបក្សប្រឆាំងទាំងពីរ...

ថ្មីដែល ផុសចេញពីគណបក្ស សម រង្ស៊ី និងនិងគណបក្សសិទ្ធិមនុស្សគណបក្សទាំងពីរក៏បាន សម្រេចបង្កើត "ចលនាប្រជាធិបតេយ្យសង្គ្រោះជាតិ" ដែលមានចលនាចម្ព័ន្ធ ដូចខាងក្រោម:

ក/ថ្នាក់ដឹកនាំ :

១-លោក សម រង្ស៊ី ជាប្រធាន

២-លោក កឹម សុខា ជាអនុប្រធាន

ខ/លេខាធិការដ្ឋាន :

១-អ្នកស្រី មូរ សុខហួរ ជាប្រធានលេខាធិការ ដ្ឋាន

២-លោក យ៉ែម បុញ្ញាឫទ្ធិ ជាអនុប្រធាន លេខាធីការដ្ឋាន

**គ/ អ្នកនាំពាក្យ:**

១-លោក ប៉ុល ហំម

២-លោក យឹម សុវណ្ណ

ក្នុងនាមយើងជាអ្នកប្រម៉ាញ់នូវយុត្តិធម៌សង្គមប្រជាធិបតេយ្យ និងនិតិរដ្ឋដ៏ពិតប្រាកដមួយ សូមចូលរួមត្រេកអរ និងសាទរចំពោះចំណងស្នេហ៍នៃបក្សនយោបាយទាំងពីរ និងសូមជូនពរឱ្យចំណងសម្ព័ន្ធភាពនេះស្ថិតនៅជានិច្ចនិរន្តន៍ ៕

## តមកទំព័រទី ៦ ចង្ក្រានខ្មែរ Kitchen

យើងហៅតែបីមុខ ហើយហូបមិនអស់ហើយ ខ្ចប់មកផ្ទះថែមទៀត ...ម្ហូបច្រើនគួរសមតម្លៃក៏សមរម្យល្មមអាចទាក់ទាញចិត្តអតិថិជនបានច្រើន បើទោះជាទិញម្ហូបយកទៅហូបនៅផ្ទះក៏រឹតតែប្រសើរទាំងគុណភាព និងបរិមាណ ។ រីឯអ្នកបំរើតុមានពីរនាក់មិនទាន់ថ្មីកគ្រប់គ្រាន់តែរហ័សរហួនរាក់ទាក់អាចមានលទ្ធភាពរីកចំរើនបាន។

សប្តាហ៍នេះនៅហ្វីឡាដែលហៀវយើងបានសិក្សារំលឹកយ៉ាងច្រើនពីប្រវត្តិដ៏អស្ចារ្យនៃថ្មមហានគរខ្មែរ តែគេគួរនឹកដល់វប្បធម៌នៃការធ្វើម្ហូបខ្មែរក៏មានដំណើរជាប់គ្នាពីច្រើនសតវត្សរ៍ជាមួយគ្នាដែរ ។ ថ្វីត្បិតតែយើងដឹងថា របាំដែលឆ្លាក់លើជញ្ជាំងអង្គរវត្តមានប្រវត្តិមកដល់សព្វថ្ងៃ គឺពុំមែនដោយសារឯកសារណាក្រៅពីការបង្រៀនពីគ្រូទៅសិស្ស ពីម្តាយទៅកូននោះទេ ដូច្នេះសិល្បៈនៃម្ហូបអាហារ ក៏ច្បាស់ជាមានកេរិតក្បួនខ្នាតរឹងប៉ឹងខ្ពង់ខ្ពស់ ដូចគ្នានឹងសិល្បៈឯទៀតៗដែរ ដែលខ្មែរគ្រប់រូបគួរការពារកុំឱ្យព្រឹត្តិការណ៍នយោបាយអាចរារាំងការត្រឡប់មករកសិល្បៈនៃម្ហូបអាហារ ខ្មែរបានឱ្យសោះ ។ ម្ហូបអាហារខ្មែរ គឺជាអត្តសញ្ញាណមួយទៀតរបស់កូនខ្មែរ ដូច្នេះ "ចង្ក្រានខ្មែរ"ប្រាកដជាការប្រឹងប្រែង ដើម្បីអត្តសញ្ញាណខ្មែរមួយនោះដែរ ៕

**ពិន សំខុន**

## តមកទំព័រទី ៤ លោកសាស្ត្រាចារ្យ ធុយ ចាន់ធួន : មានដែកនៅ...

ក៏ត្រូវបានសាងសង់ដោយពុំអាចអត់ដែកបានឡើយ" ។ លោកបញ្ជាក់ថា : កាលណាអត់ដែកនៅពេលមានភ្លៀង ឬទឹកជ្រាបនោះរាល់ សំណង់បុរាណវានឹងស្រុតចុះជាពុំខាន រីឯថ្មគង់នឹងរបេះ ឬធ្លាក់ចេញពីគ្នា ។

ចំពោះពាក្យដែលគេនិយាយតៗគ្នាថា ប្រាសាទបុរាណនានាត្រូវបានសាងសង់ឡើងអំពីថ្មភក់នោះ ត្រូវបានលោកសាស្ត្រាចារ្យទទួលស្គាល់ និងឯកភាពទាំងស្រុង ប៉ុន្តែលោកបានបដិសេធ និងច្រានចោលចំពោះពាក្យដែលថា គេយកភក់មកធ្វើប្រាសាទ ហើយភក់នោះ និងរឹងក្លាយជាថ្ម រហូតមកដល់បច្ចុប្បន្ននេះនោះ ។ នៅត្រង់ចំណុចនេះ លោកចង់បញ្ជាក់ថា: គេពុំមែនយកភក់មកធ្វើប្រាសាទទេ ប៉ុន្តែគេបានយកថ្មភក់មកធ្វើជាប្រាសាទ ។ ហើយការយកថ្មភក់នោះមកប្រើ គឺដោយប្រើប្រាស់ដែកសម្រាប់គាស់ ឬដាប់ និងកាត់ជាដើម ។ ដូច្នេះមានន័យថា កាលពីសម័យនោះបុព្វបុរសខ្មែរអាចចេះធ្វើដែករួចទៅហើយៗដែលជាហេតុធ្វើឱ្យប្រាសាទបូរាណខ្មែរនានា ចាំបាច់ត្រូវតែប្រើប្រាស់ដែកសម្រាប់តភ្ជាប់កុំឱ្យរបេះ ឬខ្ទាក់ចេញពីគ្នា ។ លោកសាស្ត្រាចារ្យបន្ថែមទៀតថា: ដែកនោះគេហៅថា ដែកទាម ដែលវាមានរាងជាអក្សរ I ហើយបើគេ មើលពីខាងក្រៅប្រាកដជាពុំឃើញដែកទាមនោះឡើយ ។

ក្រៅពីនោះ ក៏នៅមានភស្តុតាងមួយអន្លើទៀត ដែលលោក ធុយ ចាន់ធួន បានអះអាងអំពីបដិវត្តន៍នៃឧស្សាហកម្មដែកនាយុគ្គសម័យអង្គរតាមរយៈការបញ្ចាំង VIDEO Clip របស់លោក ។ ទឡ្ហីករណ៍នៃឧស្សាហកម្មដែកនាសម័យបុរាណនេះ ភាគច្រើនត្រូវបានក្រុមស្រាវជ្រាវរបស់លោកជួបប្រទះនៅឯភាគពាយ័ព្យ និងភាគឧត្តរនៃប្រទេសកម្ពុជា ដូចជា ខេត្តស្ទឹងត្រែង ខេត្តព្រះវិហារ ខេត្តបន្ទាយមានជ័យ ខេត្តកំពង់ធំជាដើម ។ ទោះជាយ៉ាងនេះក្តីលោកសាស្ត្រាចារ្យក៏បានទទួលស្គាល់អំពីកត្តាអវិជ្ជមានមួយចំនួនរបស់ក្រុមការងារលោក ។ លោកសារភាពថា: ក្រុមស្រាវជ្រាវនេះនៅពុំទាន់មានលទ្ធិភាពសិក្សាស្រាវជ្រាវ និងពិសោ... មើលថា តើសំណង់អាចម៍ដែកបុរាណទាំងនោះមានអ... កាលប៉ុន្មានឆ្នាំនៅឡើយទេ ពីព្រោះពុំមានឧបក... បច្ចេកទេសវិទ្យាសាស្ត្រ ដូចនៅតាមបណ្តាប្រទេស... លឿនមួយចំនួន ។

**កំណត់ចំណាំ :** ក្នុងនាមខ្ញុំបាទជាស្មេរនៃកា... ខ្មែរប៉ុស្តិ៍ ក៏ដូចជាសហការីដទៃៗទៀតមានការភ្ញាក់... យ៉ាងខ្លាំងចំពោះការលើកឡើងរបស់លោកសាស្ត្រា... ធុយ ចាន់ធួន ដែលលោកមានតួនាទីជាអនុប្រធានវិ... ស្ថានវប្បធម៌ និងវិចិត្រសិល្បៈដែលអះអាងថា មាន... នៅក្នុងថ្មលើប្រាសាទបុរាណនានារបស់ខ្មែរនោះ ។ ដ...



បណ្ឌិត ធុយ ចាន់ធួន ថតនៅមុខវត្តព្រះពុទ្ធរង្សីជាមួយភ្ញៀវសិក្ខា...

នេះជាលើកទី១ បំផុតសម្រាប់យើងខ្ញុំជាប្រជាពលរដ្ឋខ្មែ... ទន្ទឹមនេះ យើងមានជំនឿថា មិត្តអ្នកអានសារព័ត៌... ខ្មែរផូស ពិតជាមានប្រតិកម្មចំពោះការលើកឡើងរ... លោកសាស្ត្រាចារ្យ ធុយ ចាន់ធួន ជាពុំខាន ។ ព័ត៌... បន្ថែម ឬចង់ជ្រាបច្បាស់មិត្តអ្នកអានអាចស្រាវជ្រាវ... គេហទំព័ររបស់លោក

www.cambodiaresearch.com

តមកពីទំព័រទី

# កូនប្រុសអគ្គកុងស៊ុលខ្មែរត្រូវប៉ូលិស...

និងលេខ២ ជូនដំណើរវិញ្ញាណក្ខន្ធ សុខ វណ្ណា អាយុ ២៥ឆ្នាំ ជាកូនប្រុសអគ្គកុងស៊ុលខ្មែរ ប្រចាំហ្វីឡាដែលហ្វៀ គឺលោក សុខ សារឿន ដែលត្រូវបានប៉ូលិសបាញ់សម្លាប់នារាត្រីថ្ងៃសៅរ៍ទី១៤ កក្កដា កន្លងទៅនៅទីដែលមិត្តភ័ក្រ្ត និងក្រុមគ្រួសារប្រមាណ១០០នាក់មករួមប្រជុំស្តាប់ព្រះធម៌ ។

នារាត្រីកើតហេតុម៉ោងប្រមាណ១ភ្លឺយុវជន សុខ សុវណ្ណា ទើបនឹងមានរឿងឈ្លោះប្រកែកគ្នានឹងយុវជនមួយក្រុមទៀតនៅម្តុំឡូត្កាន់ ហើយត្រូវគេតាមមករករឿងរហូតដល់ផ្ទះ ។ បារម្ភនឹងសុវត្ថិភាពផ្ទាល់ខ្លួន សុវណ្ណា រត់ចូលផ្ទះយកកាំភ្លើងមក ហើយបាញ់គម្រាមឡើងលើពីរគ្រាប់ នេះជាសេចក្តីរាយការណ៍របស់លោក វង្ស កុសល ជាមារបស់ វណ្ណា ។ លោកបន្តថា ប៉ូលិសម្នាក់បានបាញ់វណ្ណាពីក្រោយខ្នងត្រូវក្បាលបណ្តាលឱ្យស្លាប់ជាបន្ទាប់មក ។ មានការបកស្រាយខុសៗគ្នាពីឧប្បទ្ទវហេតុនៃឃាតកម្មលើរូប សុខ វណ្ណា នេះ ដោយខ្លះថា វណ្ណា បានគម្រាមបាញ់លើប៉ូលិសមុន ហើយខ្លះទៀតថា ប៉ូលិសបាញ់ពេលវណ្ណា កំពុងបាញ់សំដៅទៅរត់យន្តដែលប៉ុនប៉ងដេញបុកមិត្តរបស់ខ្លួន តែមានសេចក្តីរាយការណ៍មួយទៀត ចេញពីការពិនិត្យកាម៉េរ៉ាដែលដាក់ប្រចាំការនៅជ្រុងផ្លូវនោះថា ប៉ូលិសបានបាញ់ សុខ វណ្ណា ពីក្រោយខ្នងសំដៅក្បាលចេញពីក្នុងរថយន្តខ្លួន ដោយពុំបានដឹងពីព្រឹត្តិការណ៍


ភរិយា សុខ វណ្ណា និងកូនប្រុស


វង្ស កុសល


វិលិយ៉ាំ


ភរិយា កូនប្រុស និងម្តាយ សុខ វណ្ណា គោរពសពជាចុងក្រោយ


អគ្គកុងស៊ុល សុខ សារឿន និងក្រុមគ្រួសារ

ដែលកំពុងកើតឡើងនៅតាមផ្លូវថា ជាយ៉ាងណានៅឡើយ ។ ប៉ូលិសពីរនាក់បានអូសរូបរាងកាយ វណ្ណា ទំនងជាស្លាប់រួចទៅហើយ ទៅដាក់ក្នុងរថយន្តខ្លួននាំយកទៅទេព្យអាញ្ញស្តាញដោយពុំហៅអំប៊ូឡង់មកដាក់ជំនួយនោះទេ ។ វណ្ណា បានត្រូវគេប្រកាសថាស្លាប់នៅមន្ទីរពេទ្យនាថ្ងៃអាទិត្យបន្ទាប់មក ។ មិត្តភ័ក្រ្តជាខ្មែរម្នាក់ឈ្មោះ វិលិយ៉ាំ ដែលជាសាក្សីផ្ទាល់ភ្នែកបានត្រូវប៉ូលិសនាំទៅឃុំខ្លួនអស់មួយថ្ងៃមួយយប់ទើបលែងមកវិញ ។

លោកអគ្គកុងស៊ុល សុខ សារឿន បាននិយាយទាំងសោកស្តាយថា "គ្រួសារខ្ញុំពុំដែលមានរឿងរ៉ាវអ្វីរបៀបនេះទេ?" រីឯលោក វង្ស កុសល បន្តថា "ក្មួយខ្ញុំកំពុងកសាងជីវភាពប្រសើររបស់គេដោយមានផ្ទះមានប៊ីស៊ី ណេស មានគ្រួសារដ៏ល្អ ហើយមានកូនមួយអាយុ២ឆ្នាំផង " ។ យុវជនយុវនារីដែលបានស្គាល់ វណ្ណា បានមកគោរពវិញ្ញាណក្ខន្ធនៅជ្រុងផ្លូវទីជ្រូ និងលេខ២យ៉ាង កកកុញបង្ហាញពីការសោកស្តាយ និងមិនពេញចិត្ត ចំពោះព័ត៌មានដ៏កាចសាហាវស្ដីពីអាជ្ញាធរប៉ូលិសនោះទេ ៕ **ខ្មែរប៉ុស្តិ៍ស.រ.អា**

# SAVE THE DATE




## 2012 Lowell Southeast Asian Water Festival

Saturday, August 18, 2012
9:00am 6:00pm
Lowell Heritage State Park
Esplanade & Sampas Pavilion
500 Pawtucket Blvd.
Lowell, Massachusetts 01854






























